ខ្មែរប៉ុស្ដិ៍ ស.រ.អា
KhmerPost USA
Printing The Cambodian World News
VOL. 05 ISSUE 81 April 23th - May 05th, 2011
សុបិន : (267) 253-3947, សែម : (781) 244-0522
MASSACHUSETTS
217 APPLETON ST.
LOWELL, MA 01852
PENNSYLVANIA
P.O.BOX 24357
PHILADELPHIA, PA 19120
RHODE ISLAND
NEW JERSEY

អាតិការរឿង | ទំព័រ



# ឆ្លាក់ឆ្នាំថ្មីឱ្យត្រូវតាមការស្រមៃ



**ដោយ : ពិន សំឌុន**

ខ្មែរប៉ុស្តិ៍ បាននាំមកនូវរូបភាពជាច្រើននាឱកាសចូលឆ្នាំថ្មី ឆ្នាំថោះ ព.ស ២៥៥៥ ដែលសហគមន៍ខ្មែរ ក៏ដូចឡាវ ថៃ ឬភូមា ចេញមកទទួលទេវ តាថ្មីប្រកបដោយ សេចក្តីសង្ឃឹម ទឹកមុខរីករាយ សំលៀកបំពាក់វប្បធម៌ ជាតិថ្មីៗគួរឱ្យគយគន់ ។

សេចក្តីប៉ងប្រាថ្នា ក្លាយជាពរជ័យ ក្លាយជាឧទ្ទិសស្ថានស្វែងរកភាពចំរុងចំរើនក្នុងគ្រួសារ រកសេចក្តីសុខទាំងបច្ចុប្បន្ន ទាំងជាតិណាៗទៅមុខទៀត បានហោះហើរចេញពីគ្រប់មាត់ ពីក្រអៅបេះដូង ហើយសង្ឃឹមយ៉ាងមាំថា ទេវតាថ្មីប្រាកដជាបានឮ ហើយប្រទានពរស្របតាមបំណងប្រាថ្នា ។

ក្លិនពិដោរនៃផ្សែងធូបទានរាប់ម៉ឺនដើម ហើរហោះហុយទ្រលោមទំនងជាអាចនាំយកសម្លេងបនស្រន់ទៅដល់វត្ថុសក្តិសិទ្ធ ដែលទើបនឹងត្រូវដង្ហែរជុំវិញភ្នំព្រះសុមេរុ និងជុំវិញសកលលោកនាថ្ងៃទី១៤ មេសា ២០១១ ព.ស ២៥៥៥ នោះបាន ។



បំណងប្រាថ្នាធំៗដែលប្រជាជនតែងតែអុជធូបបន់ស្រន់ គឺសុំឱ្យបានសុខសប្បាយចម្រុងចម្រើន រកស៊ីកាក់កប់មានបាន បន្ទាប់មកគេតែងឮសុំឱ្យសុខភាពល្អ ជួបតែមនុស្សដែលនាំមកនូវលាភសក្ការៈ

(តទៅទំព័រទី ១១)

# ចូលឆ្នាំថោះនៅសមាគមខ្មែរ

**ហ្វីឡាដែលហ្វៀ :** ភ្ញៀវប្រមាណ៥០០នាក់ បានមកជួបជុំគ្នាអឹកធិកក្នុងរាត្រីប្រារព្ធពិធីបុណ្យចូលឆ្នាំថ្មីរបស់សហគមខ្មែរ ក្រុងហ្វីឡាដែលហ្វៀ ថ្ងៃសៅរ៍ ទី៩ ខែមេសា ឆ្នាំ២០១១ ។

ស្របគ្នានឹងការចាប់ផ្តើមរដូវក្តៅ ផ្កាឈើតូចធំចេញផ្កាបន្តបន្ទាប់គ្នា រាត្រីសមោសរសហគមខ្មែរថ្ងៃនោះ មានភាពចម្លែកច្រើនជំពូក ។ ដំបូងគឺ ថ្វីត្បិតតែសំបុត្រចូលមកតម្លៃខ្ពស់ តែភ្ញៀវបានទិញសំបុត្រចូលពេញអស់ តាំងពីមុនពេលបុណ្យរួចអស់ជាស្រេច បានន័យថា ពុំមែនតម្លៃសំបុត្រទេដែលទប់ស្កាត់ការចេញមកចូលរួមល្បៀងភោជនាអាហារ

(តទៅទំព័រទី ០៣)



# Cambodian New Year in the Lynn and Revere Massachusetts

*Staff Writer: Audria Chea*

The rich tradition of Cambodian New Year Celebration has been marked at the end of the harvesting season. The beginning of the New Year's Day usually falls on either April 13th or 14th. The celebration lasts for three days. Traditionally during this time the farmers take time to enjoy the fruits of their labor before the rainy season begins.

Cambodian living abroad who left Cambodia by either choice or forced of wars chooses to celebrate the New Year during the weekends throughout the month of April and early May.

Cambodian uses both the Buddhist Era Calendar and Christ Calendar. The Buddhist Era this year is 2555 BE and Christ is 2011 A.D (Anno Domini, means "in the Year of Our Lord"). The New Year Celebration is in accustom to the **Theravada Buddhism** practices, where each year represented by each of the 12 animals calendar year; accompanied by each deity; who transported by each animal on the first day of the New Year replacing the one before.

The angels also served and secured the safe journey of the deity to earth each year.

*(Continued to page15)*



រូបថត សម ឈឿន វត្តីរ៉ៃ




# ពេទ្យធ្មេញសម្រាប់គ្រួសារ ហួ ឌួង

466 Merrimack Street. Lowell, MA 01854
( Near City Hall )/ 978-441-1005

## HOA DUONG, D.M.D., P.C.

**GENERAL DENTISTRY**

គ្រូពេទ្យជំនាញនិងមានបទពិសោធន៍
ច្រើនឆ្នាំក្នុងការពិនិត្យ
ថែរក្សា និងព្យាបាលជម្ងឺធ្មេញទូទៅ



Open: Monday, Tuesday, Wednesday, and Friday
from 10 a.m. – 6 p.m.
Saturday: from 10 a.m. – 4 p.m.
Closed: Thursday & Sunday
We accept all dental insurance & Medicaid



យើងទទួលយកគ្រប់ក្រុមហ៊ុន
ធានារ៉ាប់រងសុខភាព និងការធានារ៉ាប់រង
សុខភាពមនុស្សចាស់

**យើងបើកទ្វារទទួលភ្ញៀវ ៥ថ្ងៃ ក្នុងមួយសប្តាហ៍**
**បិទទ្វារ : ថ្ងៃព្រហស្បត្តិ៍ និងថ្ងៃ អាទិត្យ**

**ទូរស័ព្ទដើម្បីណាត់ជួប (978) 441-1005**
**ម៉ោងធ្វើការពីម៉ោង 10ព្រឹក ដល់ 6ល្ងាច**
**ថ្ងៃសៅរ៍ ពីម៉ោង 10ព្រឹក ដល់ 4រសៀល**
**យើងមានបុគ្គលិកនិយាយភាសាខ្មែរ**

តមកទំព័រទី ០១

## បូលឆ្នាំថោះនៅសមាគមខ្មែរ...

របស់សមាជិកសហគមន៍ខ្មែរនោះទេ គឺប្រាកដជាគុណភាពនៃការរៀបចំយ៉ាងយកចិត្តទុកដាក់ទទួលភ្ញៀវ ហើយនឹងឆ្លើយតបដោយភាពទុកចិត្តលើស្មារតីសមាគម ថានឹងបន្តបំរើសមាគមខ្មែរឱ្យរឹតតែប្រសើរដដែល ។ ទីពីរ រាត្រីផ្តើមរដូវផ្ការីក ហាក់ដូចជាឧទ្ទិសជូនយុវវ័យដែលយប់នោះ ភាពរីករាយ គ្មានមន្ទិល គ្មានទិទាន គ្មានសត្រូវបានកើតឡើង កុមារាកុមារី យុវជនយុវនារី បានវាតទីក្នុងកម្មវិធី តាំងពីរបាំជូនពរ រហូតដល់ការរាំកំសាន្តជាសាធារណៈ ធ្វើឱ្យគេឃើញភាណចាស់ទុំនៃសម័យថ្មីមួយ បានលេចចេញមក យុវជន ឬយុវចាស់លោតរាំទន្ទឹមគ្នា ស្មាទល់នឹងស្មា ដោយស្អាតស្អំ ដោយគ្មានប្រកាន់ ។ ណែនាំពន្យល់ដោយពិធីករចំណាន ដែលមិនភ្លេចពន្យល់ពីគ្រប់ជ្រុងជ្រោយនៃពិធីបុណ្យ គឺអ្នកស្រី សាអ៊ុំ ឈឹម និងលោក រឿម ឡុង ធ្វើឱ្យពិធីដែលចាប់ផ្តើមពីម៉ោង ៦ បានចប់សព្វគ្រប់យ៉ាងលំបាកនៅម៉ោង ១១ ភ្ញៀវខ្មែរ និងអាមេរិកាំង នៅទល់តែចប់កម្មវិធី ។

ក្នុងសាលដ៏ទូលាយ មានឆាកដ៏ធំសម្រាប់បង្ហាញកម្មវិធី ដែលទាំងអស់គ្នាអាចមើលឃើញពីចម្ងាយ សមាជិករបស់សហគមន៍បានខិតខំបំពេញតួនាទីតាមគម្រោងដែលបានត្រៀមទុក៦ខែមកហើយ ក្នុងភាពរលូនឥតខ្ចោះ។ អ្នកស្រី វ៉ង ស៊ន និងអ្នកស្រី ស៊ុន ឌី លើកនេះបានបង្ហាញស្នាដៃដឹកនាំសមាគមដោយមិនចាំបាច់រត់។ ការងារបានរំកិលទៅមុខដោយមិនចាំបាច់បង្ហាញមុខចេញបញ្ជា ហើយរាត្រីនោះ គុណសម្បត្តិការងារស្ម័គ្រចិត្ត និងដោយការព្យាយាមបានត្រូវបង្ហាញជារង្វាន់ដល់អ្នកស្រី ពុទ្ធារី ឡុង និង ឡានីកា អង់ប៉ាក់ ម្តាយនិងកូន ដែលម្តាយដឹកនាំចលនាវប្បធម៌របស់សមាគម រីឯកូនស្រីដឹកនាំនាថការីនៃចលនាយុវវ័យ និងកុមារ ដោយគ្មានសំចៃកម្លាំង និងពេលវេលា។

ភ្ញៀវនារាត្រីនោះ គឺ ម៉ាតិល ណាទ័រ អភិបាលក្រុងហ្វីឡាដែលហ្វៀ តំណាងឱ្យសមាជិកព្រឹទ្ធសភារដ្ឋ តិតឆិន លោកនាយកការិយាល័យសុខភាពចរិយាបណ្ឌិត អេរិន អទ័រ ។ មានគណក្រុមប្រឹក្សាសាលាក្រុងខាងគ្រឿងញៀន និងសុរា គេក៏ឃើញបេក្ខជនជាតិអាស៊ី សម្រាប់តំណែងគណក្រុមប្រឹក្សាអភិបាលក្រុង ដេវីដ អូ ក៏បានចូលរួមដែរ។

ដេវីដ អូ បាននិយាយប្រាប់កាសែតខ្មែរប៉ុស្តិ៍ថា "ខ្ញុំមានសង្ឃឹមថា លើកនេះខ្ញុំនឹងឈ្នះបានតំណែងក្រុងនោះជាមិនខាន កាលពីលើកមុនខ្ញុំចាញ់សន្លឹកឆ្នោត ដោយការប្រព្រឹត្តមិនសុចរិតរបស់គូប្រឆាំងខ្ញុំ


យុវសិល្បករ


លោក ដេវីដ អូ





ឥឡូវអ្នកទាំងនោះកំពុងជាប់គុកដោយអំពើទុច្ចរិតរបស់ខ្លួន នៅលើកនេះខ្ញុំគ្មានអ្នកប្រជែងនឹងខ្ញុំទៀតទេ" ។

ថ្វីត្បិតតែពិធីបុណ្យចូលឆ្នាំរបស់សមាគមខ្មែរប្រចាំក្រុងហ្វីឡាដែលហ្វៀ មានលាយពណ៌នយោបាយខ្លះៗក៏ដោយក្តី គឺជាឱកាសជួបប្រាស្រ័យទាក់ទងសហគមន៍ខ្មែរដ៏ប្រសើរបំផុត ហើយក៏ជាឱកាសឱ្យតំណាងនៃសហគមន៍ខ្មែរមួយនេះ បានបញ្ចេញស្នាដៃនៃការខិតខំប្រឹងប្រែងចងក្រងសាមគ្គីភាព លើកដំកើងវប្បធម៌ជាតិ និងបង្ហាញការរីករាយក្នុងភាពថ្លៃថ្នូយ៉ាងតត្រឹកតគ្រេងបានដែរ ៕ **ពិន សំខុន**

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា ស៊ីន សាន




ដោយ : ម៉ម យឹន

•••សួស្ដីប្រិយមិត្តអ្នកអានសារព័ត៌មាន ខ្មែរប៉ុស្ដិ៍ សហរដ្ឋអាមេរិក ជាទីមេត្រីរាប់អាន ខ្ញុំបាទឈ្មោះ ម៉ម យឹន ជាអ្នកនិពន្ធប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ សូមជំរាបបញ្ជាក់ថា : ដើម្បីជាកិច្ចចាប់ផ្ដើម ខ្ញុំបាទសូមលើកយកមូលហេតុសំខាន់ៗ មកធ្វើជាកម្មវត្ថុយោងជំរាបជូនជាមុនសិន។ ពីព្រោះមានមូលហេតុជាច្រើនមុនពេលដែលបណ្ដាលឱ្យកើតមានការចាប់បដិសន្ធិកកើតឡើងនៃរណសិរ្សជាតិនេះ មានដូចតទៅ :

**១.** ព្រឹត្តិការណ៍មុនឆ្នាំ១៩៧០

**២.** សង្គ្រាមចាប់ផ្ដើមនៅថ្ងៃទី១៨ ខែមីនា ឆ្នាំ១៩៧០ដល់១៩៧៩ ដោយសារមានហេតុការណ៍កើតឡើងដូចតទៅនេះ :

- វិបត្តិនយោបាយនៃចលនាសង្គមរាស្ត្រនិយម
- ដោយសារដកហូតអំណាចពីប្រមុខរដ្ឋប្រធានចលនាសង្គមរាស្ត្រនិយម
- ដោយសារកងទ័ពយួនយៀកកុង ចូលមកបោះទីតាំងទ័ពនៅក្នុងទឹកដីប្រទេសខ្មែរ តាមបណ្ដោយព្រំដែន
- ដោយសារមានការជួយឧបត្ថម្ភពីមេដឹកនាំខ្មែរក្នុងគ្រប់មធ្យោបាយ មានការផ្ដល់អាវុធ គ្រប់រំសេវសម្ភារៈសឹក និងស្បៀងអាហារដល់ទ័ពព្រៃយួនយៀកកុង
- ដោយសារបណ្ដាលឱ្យសេដ្ឋកិច្ចខ្មែរត្រូវធ្លាក់ចុះស្ទើរដល់ចំណុចសូន្យ
- ដោយសារបណ្ដាលឱ្យមហាជនស្នេហាជាតិខ្មែរគ្រប់មជ្ឈដ្ឋាន ត្រូវតែរួមសាមគ្គីគ្នាប្រឆាំងនឹងការដឹកនាំរបស់ប្រមុខរដ្ឋខ្មែរ ក្នុងករណីរឿងកងទ័ពយួនយៀកកុងនេះ រហូតបណ្ដាលឱ្យមានការវាយប្រយុទ្ធគ្នាយ៉ាងសាហាវឃោឃៅបំផុត តាមការស្នើសុំរបស់អតីតប្រមុខរដ្ឋ ទៅដល់កងព័ទយួនយៀកកុងឱ្យជួយវាយដំណើមយកអំណាចមកថ្វាយព្រះអង្គវិញ។

**៣.** សង្គ្រាមបានចប់ទៅនៅថ្ងៃទី១៧ ខែមេសា ឆ្នាំ១៩៧៥ ដោយសារជ័យជំនះកងទ័ពខ្មែរក្រហម ក្រោមការដឹកនាំរបស់សម្ដេច សីហនុ ខៀវ សំផន ប៉ុល ពត រួចហើយបានដឹកនាំប្រទេសខ្មែរពីឆ្នាំ១៩៧៥ ដល់១៩៧៨ (ព្រឹត្តិការណ៍សម្ងាត់ឆ្នាំ១៩៧៧ ដោយក្រុមសម្ងាត់មួយក្រុម ដើម្បីផ្ដួលរំលំខ្មែរក្រហម ខៀវ សំផន និងមានព្រឹត្តិការណ៍ផ្សេងៗ កើតមាននៅក្នុងសម័យនោះ ១៩៧៥-១៩៧៨)។

**៤.** ការត្រួតត្រាលើប្រជាពលរដ្ឋខ្មែរ របស់ខ្មែរក្រហមកម្ពុជាប្រជាធិបតេយ្យ ដោយមាន ជន្លៀសប្រជាពលរដ្ឋចេញពីទីក្រុងទៅកាន់ជនបទ ស្ថានភាពរស់នៅក្នុងជនបទមានការបង្ខំឱ្យធ្វើការ ការបង្អត់អាហារ ការឈឺស្លាប់ ការកាប់សម្លាប់ ការបំបិទសិទ្ធិសេរីភាពប្រជាពលរដ្ឋ ។ល។និង។ល។

**៥.** ការព្រឹត្តរបស់កម្មាភិបាលគ្រប់ជាន់ថ្នាក់ (អង្គការ) ដូចជា

- ការមានទំនាស់គ្នារវាងកម្មាភិបាលនៃភូមិភាគនីមួយៗ
- ទំនាស់រវាងកងទ័ពខ្មែរក្រហម និងកម្មាភិបាល
- ការកាប់សម្លាប់គ្នាឯង រវាងភូមិភាគ១ និងភូមិភាគមួយទៀត

**៦.** ការសម្លាប់ប្រជាពលរដ្ឋដោយផ្ទាល់ និងដោយប្រយោល ដោយសារតែកំហុសបន្តិចបន្តួចដូចជា បំពេញការងារពុំបានសម្រេចដោយខុសសីលធម៌... ។ល។

**៧.** ស្ថានភាពរស់នៅរបស់ប្រជាពលរដ្ឋ នៅពេលកងទ័ពយួនចូលវាយលុកលុយនាចុងឆ្នាំ១៩៧៨

- សកម្មភាពកងទ័ពយួនក្រហមទៅលើប្រជា-ពលរដ្ឋខ្មែរ
- ការផ្ដត់ផ្គង់ម្ហូបអាហារ, ការឃោសនា, ការស្រាវជ្រាវរាវរកជនប្រឆាំងកងទ័ពយួន និងការរត់ភៀសខ្លួនចេញទៅកាន់ជាយដែនខ្មែរ-ថៃ ។

**៨.** សកម្មភាពរបស់អង្គការមនុស្សធម៌អន្តរជាតិនៅក្នុងជំរំភៀសខ្លួន នាឆ្នាំ១៩៧៩

- ការផ្ដត់ផ្គង់ម្ហូបអាហារ និងសម្ភារៈប្រើប្រាស់ចាំបាច់សម្រាប់ការរស់នៅ
- សកម្មភាពជួយសង្គ្រោះជនដែលមានជម្ងឺគ្រប់ប្រភេទ ដោយក្រុមគ្រូពេទ្យអន្តរជាតិនៃអង្គការកាកបាទក្រហមអន្តរជាតិ
- ការសង់មន្ទីរពេទ្យ, ការបង្ហាត់បង្រៀនដល់បុគ្គលិកពេទ្យ, ការបង្ហាត់បង្រៀនកិច្ចការរដ្ឋបាល និងសង្គមកិច្ច
- ការទទួលយកជនជាតិខ្មែរ ឱ្យចេញទៅរស់នៅប្រទេសទី៣ ដោយសារប្រទេសលោកសេរី មានដូចជា សហរដ្ឋអាមេរិក ប្រទេសបារាំង ប្រទេសកាណាដា ប្រទេសអូស្ត្រាលី ប្រទេសញូវសេឡង់ ប្រទេសជប៉ុន និងប្រទេសសេរីផ្សេងៗទៀតជាច្រើន

**៩.** ស្ថានភាពរស់នៅរបស់ប្រជាពលរដ្ឋខ្មែរ នៅក្នុងប្រទេសខ្មែរ ចាប់តាំងពីឆ្នាំ១៩៧៩ រហូតមកដល់សព្វថ្ងៃនេះ

**១០.** ព្រឹត្តិការណ៍ពិសេស កើតចេញមកពីសកម្មជនស្នេហាជាតិពិតប្រាកដគ្រប់ជាន់ថ្នាក់ ដើម្បីរួបរួមសាមគ្គីគ្នាបង្កើតរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ ឱ្យរួចចេញផុតពីគម្រោងផែនការប្រទេសយួនក្រហមកុម្មុយនីស្ត ។

សូមលើកយកព្រឹត្តិការណ៍សំខាន់ៗទាំង១០ចំណុចនេះ មកថ្លែងរៀបរាប់ឱ្យបានលំអិតបន្តិច ដើម្បីឱ្យបានកាន់តែជ្រាបច្បាស់ សូមតាមដានដោយមេត្រី។

### ភាគទី១. ព្រឹត្តិការណ៍មុនឆ្នាំ១៩៧០

ប្រទេសខ្មែរ បានធ្លាក់ទៅនៅក្រោមអំណាចអាណានិគមនិយមបារាំងសែស កាលពីឆ្នាំ១៨៦១ ដោយមានប្រទេសពីរទៀត គឺប្រទេសឡាវ និងប្រទេសយួន ឬវៀតណាម។ បារាំងបានដាក់ប្រទេសទាំង៣នេះថា ឥណ្ឌូចិន ។ ចំណែកប្រទេសវៀតណាមនៅពេលនោះមានតែភាគខាងជើង និងកណ្ដាលទេ រីឯភាគខាងត្បូង គឺជាដែនដីខ្មែរកម្ពុជាក្រោមរបស់ប្រទេសខ្មែរកម្ពុជា ដូច្នេះបារាំងបញ្ជាឱ្យខ្មែរហៅថា កូសាំងស៊ីន ។

ពាក្យថា កូសាំងស៊ីន នេះ គឺក្លាយមកពីពាក្យយួនថា កូជិនស៊ិន ។

ពាក្យថា កូជិនស៊ិន នេះ គឺក្លាយមកពីពាក្យយួនថា កូជិនស៊ិន ប្រែជាខ្មែរថា នាង ជិនសុំ ប៉ុន្តែបារាំងបញ្ជាឱ្យខ្មែរនិយាយថា កូសាំងស៊ីន ទៅវិញ ។ ពាក្យថា នាង ជិនសុំ នេះមានទាក់ទងនឹងប្រវត្តិសាស្ត្រខ្មែរ





កាលពីឆ្នាំ១៦២១ មានស្ដេចខ្មែរ១អង្គ នាមជ័យ-ជេដ្ឋាទី២ បានរៀបអភិសេកជាមួយកូនស្រីស្ដេចយួន នៅពេលដែលកូនស្រីស្ដេចយួនបានក្លាយមកជាមហេសីស្ដេចជ័យជេដ្ឋានទី២ ហើយបានសុំស្ដេចឱ្យអនុញ្ញាតជនជាតិយួននេតាមដីសណ្ដនៃទន្លេមេគង្គ ហើយរស់នៅយ៉ាងស្ងៀមស្ងាត់កាន់តែកើនច្រើនឡើងៗ រហូតមកដល់សព្វថ្ងៃនេះ ។

អាណានិគមនិយមបារាំ បានត្រួតត្រាប្រទេសឥណ្ឌូចិននេះ អស់រយៈពេល៩២ឆ្នាំ គឺបារាំងបានប្រគល់ឯករាជ្យពេញបរិបូរមកឱ្យជនជាតិខ្មែរវិញ កាលពីថ្ងៃទី៩ ខែវិច្ឆិកា ឆ្នាំ១៩៥៣ ក្រោយពីប្រជាពលរដ្ឋខ្មែរគ្រប់ជាន់ថ្នាក់ភ្ញាក់រឭក ក្រោកឈរឡើងរួមសាមគ្គីគ្នា នៅជុំវិញមេដឹកនាំរបស់ខ្លួន ដែលជាមហាក្សត្រម្ចាស់ផែនដី ទៅចរចាទាមទារយ៉ាងហ្មឹងម៉ាត់ និងអង់អាចក្លាហានយ៉ាងប្ដូរផ្ដាច់ ជំរុញឱ្យប្រទេសបារាំង ត្រូវតែយល់ព្រមប្រគល់ឯករាជ្យពេញបរិបូរមកឱ្យប្រទេសខ្មែរជាស្ថាពរ កាលពីថ្ងៃទី ៩ ខែវិច្ឆិកា ឆ្នាំ១៩៥៣។ ដូច្នេះ ថ្ងៃទី៩ ខែវិច្ឆិកានេះ ត្រូវបានប្រជាពលរដ្ឋខ្មែរ ប្រកាសជាផ្លូវការថា ជាថ្ងៃមហាជោគជ័យនៃការបានទទួលឯករាជ្យពេញបរិបូរ ហើយចាត់ទុកជាថ្ងៃប្រារព្ធធ្វើបុណ្យរំឭកពីជ័យជំនះនេះ ជារៀងរាល់ឆ្នាំដែរ ។

សេចក្ដីសប្បាយរីករាយ និងសម្រែកជ័យឃោសនីលាយដោយសេចក្ដីសង្ឃឹមយ៉ាងមាំក្នុងចិត្តរបស់ប្រជាពលរដ្ឋខ្មែរគ្រប់រូបមានជាអតិបរមា តិតជាប់នៅក្នុងក្រអៅបេះដូងថា ចាប់តាំងពីពេលនេះតទៅជារៀងរហូត ប្រទេស និងប្រជាជាតិខ្មែរប្រាកដជាបានស្ថិតនៅក្នុងសុខសន្តិភាព វឌ្ឍនភាព ឧត្ដមភាព ឥស្សរភាព បូរណភាព អធិបតេយ្យភាពទឹកដី ឯករាជ្យភាព សុខុមាភាពក្នុងសង្គម និងស្ថេរភាពជានិរន្តរ៍តទៅ ។

(មានតនៅលេខក្រោយទៀត)

# យោបល់ព្រះសង្ឃលើសន្និបាតសហគមន៍ព្រះសង្ឃខ្មែរនៅសហរដ្ឋអាមេរិក

ដោយ : ពិន សំខុន

**ព្រះតេជគុណ ញ៉ែម គិមតេង :** មកពីវត្តព្រៃព្រក ឆ្លាក់ ខេត្តស្វាយរៀង ជាបណ្ឌិតផ្នែកទស្សនៈវិជ្ជា



ព្រះពុទ្ធសាសនា សាកលវិទ្យាល័យ ញូវដេលី ឆ្នាំ ២០០៨ ព្រះអង្គមានយោបល់នៅចុងបញ្ចប់នៃឱកាសប្រជុំសន្និបាទសហគមន៍ព្រះសង្ឃខ្មែរ នៅ ស.រ.អា នេះថា "អាត្មាមានសង្ឃឹមថា កិច្ចប្រជុំនេះនឹងនាំឱ្យមានការចូលរួមរបស់ព្រះសង្ឃកាន់តែច្រើននៅថ្ងៃមុខ ហើយសហគមន៍ព្រះសង្ឃនឹងមានដំណើរការណ៍ល្អ សម្រាប់ជាប្រយោជន៍ដល់ប្រជាពលរដ្ឋខ្មែរ និងព្រះសង្ឃនៅ សហរដ្ឋអាមេរិកនេះ។ នៅសហរដ្ឋអាមេរិកនេះ ការគ្រប់គ្រងវត្តអារាមមិនដូចគ្នា និងការគ្រប់គ្រងនៅកម្ពុជាទេ គឺនៅកម្ពុជាមានការគ្រប់គ្រងតាមបែបបុរាណ មានលំដាប់ថ្នាក់ជាសម្តេចសង្ឃ គណសង្ឃថ្នាក់ខេត្ត គណសង្ឃថ្នាក់ស្រុក គណសង្ឃថ្នាក់វត្ត នៅយើងឯណេះវិញ ពុំមានមន្ត្រីសង្ឃរបៀបនោះទេ គឺមានតែសហគមន៍ព្រះសង្ឃតែប៉ុណ្ណោះ ពុំមានគណកម្មការសម្រាប់រដ្ឋ ឬក្រុមណាមួយទេ។ នៅពេលបញ្ចប់សន្និបាទព្រះសង្ឃបានសម្រេចជាចំនួច៨ ដែលជាចំណុចគោល យើងនឹងយកទៅបំបែកជាផ្នែកតូចៗ ដើម្បីអនុវត្តន៍ អាត្មាយល់ថា ដើម្បីគ្រប់គ្រងព្រះសង្ឃនៅទីនេះ សហគមន៍ព្រះសង្ឃ ត្រូវបង្កើតជាច្បាប់ថ្មីៗទៀត យកមកអនុវត្តន៍ឱ្យមានប្រសិទ្ធភាពល្អ។ ថ្វីត្បិតតែរចនាសម្ព័ន្ធនៅស្រុកខ្មែរ និងនៅទីនេះមិនដូចគ្នាក្តី តែអាត្មាយល់ថា អាត្មាមកនេះមានប្រយោជន៍ខ្លាំងណាស់ សម្រាប់យល់ដឹងពីការប្រព្រឹត្តទៅនៅសហគមន៍ព្រះសង្ឃ ហើយម្យ៉ាងទៀត ប្រយោជន៍ក្នុងទំនាក់ទំនងរវាងព្រះសង្ឃខាងក្នុង និងខាងក្រៅប្រទេស ។ អាត្មាមានការរីករាយណាស់ ដោយបានឃើញឧបាសក ឧបាសិកា មានជំនឿ និងជ្រះថ្លាចំពោះវត្តអារ៉ាម មិនត្រឹមតែទទួលចង្ហាន់គ្រប់ពេល និងយ៉ាងបរិបូរណ៍ទេ ថែមទាំងនាំគ្នាមកតាមដាន





ស្តាប់កិច្ចពិភាក្សាកិច្ចប្រជុំព្រះសង្ឃយ៉ាងច្រើនទៀតផង។

**ព្រះតេជគុណ ឃាង សុចិត្រា :** មកពីវត្តមណ្ឌលព្រះពុទ្ធសាសនា រ៉ូដអាយឡិន្ត ។ មកពីតំបន់ដែល



មានប្រជាពលរដ្ឋខ្មែរប្រមាណ៧០០០នាក់រស់នៅ ព្រះអង្គមានសង្ឃដីការថា "កិច្ចប្រជុំនេះ មានសារសំខានខ្ញុំណាស់ ដោយជាឱកាសអាចជួបព្រះសង្ឃឯទៀតៗជាច្រើន ផ្លាស់ប្តូរយោបល់គ្នា អាចផ្តល់ឱ្យមានការរីកចំរើនដល់ព្រះពុទ្ធសាសនានៅសហរដ្ឋអាមេរិកនេះ។ អាត្មាមានការចាប់អារម្មណ៍ជាខ្លាំងលើកិច្ចពិភាក្សាស្តីពីសាមគ្គីធម៌រវាងព្រះសង្ឃ និងព្រះសង្ឃ ។ នៅពេលនេះសម្រាប់សហរដ្ឋអាមេរិកមានវត្តជាង១០០ តែមានវត្តតិចតួចណាស់ដែលបានបញ្ជូនព្រះសង្ឃមកចូលរួម ដូចនៅរ៉ូដអាយឡិន្តមានវត្តបី ប៉ុន្តែវត្តតែពីរទេ ដែលបានបញ្ជូនព្រះសង្ឃមកចូលរួម ដូចនេះសាមគ្គីធម៌នៅមានគំរិតតិចតួចណាស់ សាមគ្គីនេះសំដៅទៅលើការចូលរួម ហើយវែកញែក ពិភាក្សារកភាពរីកចំរើន និងអភិវឌ្ឍន៍វិស័យព្រះពុទ្ធសាសនា ព្រះសង្ឃត្រូវតែមានការចាប់អារម្មណ៍ទៅលើកិច្ចការរបស់ខ្លួន ការចូលរួមនេះនឹងឈានទៅដល់ស្និបាតមួយទៀតមនាឆ្នាំក្រោយ ដែលរឹតតែមានសារសំខាន់ណាស់ទៅទៀត គឺកិច្ចការងារ ឧបោសុទ្ធកម្ម បើបានធ្វើកិច្ចការងារ ឧបោសុទ្ធកម្មនោះរួចហើយ នោះជាកិច្ចការរបស់សង្ឃ និងរបស់ព្រះពុទ្ធសាសនា បើមិនចូលរួមទេ គឺបានន័យថា មិនចាប់អារម្មណ៍។ អាត្មាគិតថា "ថ្វីត្បិតតែ

(តទៅទំព័រទី០៦)

KhmerPost USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im, Audria Chea, Sovan Heng**

*Contributed Writers:*
**Mam Yin, Kim Phien, Lanica Angpak, & Dannely Sam**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
**267-253-3947**
**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Doch Vuthy**
~~~~~

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Pennsylvanian & Massachusett.
~~~~

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
U.A.M.G.
P.O. Box 24357
Philadelphia, Pa 19120
~~~

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009
~~~

# សារថ្វាយព្រះឥន្ទ្រនាឆ្នាំថោះ គ.ស២០១១

(តពីលេខមុន)

**ដោយ : គ្រូធំ**

ចេះដើរឱ្យទាន់សម័យ ខំប្រឹងឱ្យអស់កម្លាំងកាយ និងចិត្តដើម្បីបុព្វហេតុនៃការកម្រើតវាសនាប្រទេសជាតិរបស់ខ្លួន ។

ផ្ទុយទៅវិញ ក្នុងពេលនោះប្រទេសអានណាមជាប្រទេសចំណុះបារាំងសោះ ប៉ុន្តែស្តេចគេឆ្លាតវៃជាង ចេះយកចិត្តបារាំងជាង ខំធ្វើការឱ្យបារាំងអស់ពីចិត្ត ខំបណ្តុះបណ្តាលកូនចៅគេឱ្យរៀនសូត្របានច្រើន គេសម្បូរអ្នកចេះដឹងជាងខ្មែរ បានបារាំងយកប្រើការឱ្យជំនួសខ្មែរថែមទៀតផង ហើយយួនអាចសុំឱ្យបារាំងធ្វើនូវកិច្ចការចំណេញទោលើគេ ហើយខាតប្រយោជន៍មកលើខ្មែរបានយ៉ាងងាយផង (យួនប្រើបារាំង)។ គួរតែខ្មែរដើរតួនាទីរបស់យួននោះទើបត្រូវ ។ តែធ្វើម៉េចទៅបើស្តេចខ្មែរជំនាន់ក្រោយអង្គរបាត់អង្គរបាត់ម្ចាស់ការទៅហើយ!។

ឱប្រះឥន្ទ្រដ៏មហាធំផុតលោក! រឿននេះហួសទៅហើយ រំលឹកឡើងវិញនាំតែឈឺផ្សា ហើយកែប្រែក៏មិនបានទៀតឡើយ បានត្រឹមតែជាមេរៀនតែមេរៀនក៏មិនមានប្រយោជន៍អ្វីដែរ ព្រោះអ្នកដឹកនាំខ្មែរមិនចាំមេរៀន ឬមិនបានរៀនមេរៀនទាល់តែសោះ ដូចជាកុកពុំចាំជង់ ឯជង់ចាំកុកជានិច្ច។

ខ្មែររស់តែក្រោមភាពអាមាស់ច្រើនរយឆ្នាំ លើករាជធានីទៅរកទីតាំងថ្មីមិនចេះចប់ដូចគេលើកកញ្ជើដើររកហុងស៊ុយមិនត្រូវ ទៅតាំងកន្លែងណាក៏សត្រូវតាមវាយបំបាក់គួរឱ្យអាណិត! តែពេលបានសុខពុំបានកសាង រៀបចំឱ្យប្រសើរឡើងទេ គិតតែសប្បាយបឹងប្រយោជន៍ផ្ទាល់ខ្លួន រហូតដល់ចរិកខ្មែរក្លាយជាយ៉ាងនោះសឹងតែទាំងអស់គ្នា! ស្អីមកដល់ចាំគិត ។ ទីបំផុតតាត្រសក់ផ្អែមបានប្រទានគ្រាប់ពូជឱ្យមួយគ្រាប់ដែលខ្មែរសង្ឃឹមថា ជាង៥០០ឆ្នាំខំត្រដររស់ដោយអាមាស់នោះប្រហែលជាបានងើបក្បាលឡើងរួចវិញហើយ ខំអរសស្រាក់សស្រាំ ថ្វាយព្រះនាមថាសម្តេចឪ ខ្លះក៏ជឿថា ព្រះបាទធម្មិករាជ្យ សមព្រះអង្គច្រើនតែមានបន្ទូលថា ខំធ្វើឱ្យប្រទេសដើរឆ្ពោះទៅរកសម័យអង្គរដ៏រុងរឿង ប្រជានុរាស្ត្រដង្ហែតាមព្រះអង្គដោយគ្មានខ្លាចស្លាប់ឡើយ ។ ឃើញថាតែជាង១០ឆ្នាំសោះ ប្រទេសកម្ពុជាដោយថ្វីប្រហស្ថរបស់ព្រះអង្គបានសុខសាន្ត ហើយបោះជំហានយ៉ាងលឿនទៅមុខគួរជាទីពេញចិត្ត ។ ខ្មែររីកចិត្តរីកថ្លើមគ្រប់គ្នាសង្ឃឹមថា សម្តេចឪ មុខតែនឹងនាំកូនចៅទៅកាន់សម័យអង្គពិតមែនហើយ តែអនិច្ចារៀអើយព្រះអង្គត្រឡប់ទៅតាមគន្លងចាស់របស់អ្នកដឹកនាំខុសផ្លូវពីមុនៗទៀតទៅវិញ ។ មិនព្រមអើពើនឹងឱប្បការីដ៏ឧត្តមទាំងឡាយដែលព្រះអង្គធ្លាប់បានទទួលនូវយោបល់ដ៏ល្អៗទាំងឡាយ រហូតដល់ព្រះអង្គមិនព្រមជឿសំដីព្រះមាតាទ្រង់ថែមទៀត ។ ព្រះអង្គសប្បាយនឹងកិត្តិយសចិនពោលសរសើរ យួនកុម្មុយនិស្តបញ្ចើចបញ្ចើរព្រះអង្គឱ្យធ្លាក់ក្នុងរឿងរបស់ Lafontaine (មានគតទំលើមែកឈើរងៀវឱ្យបញ្ច្រោងស្តាប់):

បងគតអើយពីរោះម្លោះទេ ម្ដឹងៗសមតែឱ្យធ្វើមេបិទភ្នែកមួយពិរោះប៉ុណ្ណឹង បិទទាំងពីរពិរោះប៉ុណ្ណា?

អាគតសប្បាយភ្លេចខ្លួនតាំងទទះស្លាប បិទភ្នែកទាំងពីរក៏ញូតែ "កុកគីគីក្រក" រួចកញ្ច្រោងចិនយួនក៏ក៏បើកភ្នែកធំៗលោតសង្គ្រប់ប្រហារបាត់ទៅ ។ ព្រះអង្គហើយព្រះអង្គធ្វើខុសព្រះអង្គបាត់រាជ្យបល្ល័ងទាំងកូនចៅព្រះអង្គបាត់អស់នគរទាំងមូល!។

កូនចៅព្រះអង្គជឿទុកចិត្តព្រះអង្គ១០០ភាគរយ ព្រោះព្រះអង្គតែមានបន្ទូលថា : ព្រះអង្គជាស្តេច ព្រះអង្គមិនអាចជាកុម្មុយនិស្តបានទេ ហើយពិសេសព្រះអង្គមិនអាចធ្វើជាខ្ញុំកញ្ជះគេទេ ។ តែព្រះអង្គមានបន្ទូលផ្សេង ឯការធ្វើផ្សេងទៅវិញ រហូតដល់ប្រទេសយើងរលាយអស់គ្មានសល់ ។ អន្តរជាតិគេបានស្វែងរកឯករាជ្យ សន្តិភាពឱ្យយើងបាន ហើយព្រះអង្គនៅតែខំស្វែងរកទីមមកដាក់ឱ្យខ្មែរទាល់តែបាន ។ ម៉េចឥឡូវព្រះអង្គមិនចេញស្តីមួយមាត់សោះស្ងាត់អ្វីស្ងាត់ម្លឹងៗ? កូនចៅព្រះអង្គអស់ក្តីរំពឹងលើព្រះអង្គហើយ គ្នាដាក់ក្តីសង្ឃឹមទៅលើព្រះឥន្ទ្រវិញក្រែងព្រះឥន្ទ្រលោកមានព្រះតម្រិះខ្លះគ្រាន់គ្នាពឹងពាក់ ។

ឱព្រះឥន្ទ្រដ៏ជាទីគោរព សូមព្រះអង្គមេត្តាប្រោសប្រណីសណ្តោសទតចុះមកកូនចៅកម្ពុជាផង ព្រៃឈើត្រូវបំផ្លាញពាយ ត្រីសាច់ត្រូវហិនហោចអស់ហើយ រ៉ែក្រោមដីត្រូវរុករកស្ទើរអស់ មាសពេជ្របាត់បង់អស់តស្ទើរគ្មានសល់ ឥឡូវអស់មានអ្វីយកទៅអភិវឌ្ឍន៍ ក៏តាំងដេញរាស្ត្រក្រីក្រនៅជាយក្រុងយកដីលក់ ។ អស់ដីជាយក្រុង បែរជាទៅដេញរាស្ត្រដែលមានដីស្រែបន្តិចបន្តួចឱ្យរត់ទៅនៅក្រោមដើមឈើ ក្រោមសំយ៉ាបផ្សារបែរជាថាអាណាធិបតីម៉េចក៏អភិវឌ្ឍន៍អីយ៉ាងណឹង សម្តេចឪចេះតែមិនស្រួលក្នុងព្រះកាយ ស៊ូនៅឆ្ងាយពីប្រជារាស្ត្រសម្ងំបាត់សម្លេងឈឹង ម្លឹងៗតើវាទៅជាយ៉ាងណា ?

ឱព្រះឥន្ទ្រាធិរាជដ៏ឧត្តមសូមព្រះអង្គជួយណែនាំអ្នកដឹកនាំខ្មែរមើលមុខគ្នាឱ្យចំ ញញឹមដាក់គ្នាដើម្បីដោះវិបត្តិស្រុកទេសជាមួយគ្នា សូមមើលគ្រោះថ្នាក់បាត់បង់ប្រទេសជាតិជាបញ្ហារួម ម្តងនេះជាចុងក្រោយហើយ នៅសល់តែម្ភៃពីរខេត្តនៅត្រង់កណ្តាលនេះជាដីកេរ្តិ៍ចុងក្រោយរបស់ដូនតា សូមជួយរក្សាគ្នាកុំឱ្យកូនចៅយើងក្លាយជាជនគ្មានទឹកគ្មានដីរស់នៅ ។ រស់នៅលើដីឯងសោះ តែត្រូវជនជាតិដទៃត្រួតត្រា ដូចបងប្អូនយើងដែលរស់នៅឯស្រុកសៀមឬឯកម្ពុជាក្រោមនោះ ។ សូមកុំឱ្យម្ភៃពីរខេត្តចុងក្រោយនេះក្លាយជា "បស់អាន់ទៀកហើយរើយ"។

តែប៉ុណ្ណឹងតែព្រះអង្គ សូមព្រះអង្គជួយមេត្តាសម្រុះសម្រួលឱ្យអស់លោក្បតីតប្រយោជន៍ជាតិជាធំជាងប្រយោជន៍បក្សពួក និងប្រយោជន៍ផ្ទាល់ខ្លួន សូមឱ្យអស់លោកមើលឃើញរាស្ត្រក្រខ្សត់សុំឱ្យតែបានមួយថ្ងៃបាយពីរពេលនឹងត្រីងៀតកញ្ចះអាំងរាស្ត្រក្រីក្រកំពង់ឆ្នាំងជិះកង់ដឹកល្អីកញ្ជើលក់ដល់ភ្នំពេញ ក្រចេះ ស្ទឹងត្រែង រតនគិរី ឱ្យតែបានបាយស៊ី និងប្រហុកដុត គឺគ្រប់គ្រាន់ហើយ! សូមអស់លោកមេត្តាអាណិតគ្នាផង ទឹកដីនេះជារបស់គ្នាដែរ អស់លោក! បើបាត់បង់អស់ទឹកដីនេះទៅកូនចៅរបស់អស់លោកក៏ក្លាយជាខ្ញុំគេដែរ មិនតែពួកអ្នកទាំងអស់នោះទេ។

ព្រះឥន្ទ្រជាទីគោរព! នេះគឺបំណងប្រាថ្នារបស់យើងខ្ញុំសុំឱ្យព្រះអង្គជួយ! អស់ហើយ! អស់រលីងហើយព្រះអង្គ! បើបណ្តោយទុកតែយ៉ាងនេះមុខតែកូនចៅព្រះអង្គរលាយហើយ រលាយគ្មានសល់ទេក្រាបទូល! កុំឈ្លោះប្រកែកគ្នាយកឈ្នះចាញ់ទៀតត្រូវហ៊ានសារភាពកំហុសរបស់ខ្លួន ហើយរួមគ្នាកំចាត់សត្រូវរួមទើបត្រូវ។

សូមព្រះអង្គណែនាំតែប៉ុណ្ណឹងបានហើយ បើមិនស្តាប់ព្រះអង្គទៀតទេពិតជាចប់ហើយព្រះអង្គ! ព្រោះគ្មាន "គ្រូអាចារ្យណាប្រដៅព្រះអង្គឡើយ" ឬនៅមានអាចារ្យណាទៀតដែរ? ៕

**ពីទូលបង្គំជាខ្ញុំ : អាចារ្យធំ**

**តមកទំព័រទី ០៥**

## ចូលឆ្នាំថោះនៅសមាគមខ្មែរ...

ក្នុងអង្គប្រជុំ មានព្រះសង្ឃពីរបីអង្គមិនយល់ស្របតាមមតិទូទៅ គឺជាវិស័យដែលព្រះសង្ឃទាំងនោះមានចំណេះខុសៗគ្នា ដែលលោកមើលឃើញផ្លូវផ្សេងសម្រាប់មកចូលរួមយោបល់ ពុំមែនជាទំនាស់ទេ រីឯការចូលរួមដោយចំនួនព្រះសង្ឃតិចតួច គឺដោយសារតែទំនាក់ទំនងរដ្ឋបាលមានការខ្វះខាត ទើបព្រះសង្ឃខ្លះមិនបានទទួលដំណឹង ឬមិនបានឱ្យសារសំខាន់ដល់ស្និបាទមួយឆ្នាំម្តងនេះ។ អាត្មាមានអារម្មណ៍រីករាយណាស់ដោយព្រះអង្គចៅអធិការ សែម សុខឿន រៀបចំមានកន្លែងប្រជុំបានល្អ ទាំងទីកន្លែងប្រជុំ ទាំងចង្ហាន់បិណ្ឌបាត ហើយទីពីរទៀតចូលរួមដោយព្រះអង្គ ញៀម គិមតេង ព្រះអង្គ សម យូស មកពីកាណាដា ព្រះអង្គ រិទ្ធិពល ដែលសុទ្ធតែជាអ្នកចេះអាចធ្វើឱ្យអាត្មាស្តាប់ បានផ្តល់យោបល់ផង និងបានសិក្សាពិចំណេះថ្មីៗទៀតផង។ តាមទស្សនៈអាត្មាឃើញទីនេះមានភាពចំឡែក ដែលខុសពីនៅរ៉ូដអាយឡិន្ត ដែលពុទ្ធបរិស័ទនាំគ្នាជួយរៀបចំបោសសំអាត ធ្វើចង្ហាន់ ដែលជាការងារឧបត្ថម្ភ ហើយជាពិសេសទៅទៀត នាំគ្នាស្តាម តាមដានកិច្ចពិភាក្សារបស់សន្និបាទរហូតដល់ចប់ ខាងអាត្មាឯណោះ គេមិនសូវចាប់អារម្មណ៍ស្តាប់កិច្ចពិភាក្សាសហគមន៍ព្រះសង្ឃទេ ។

**ព្រះតេជគុណ សុខា :** ចៅអធិការមកពីវត្តពោធិសុវណ្ណរាម ទីក្រុងសាំងមូលីណូ កាលីហ្វ័រញ៉ា



សាងព្រះផ្នួសតាំងពីអាយុ២០ឆ្នាំ ឥឡូវព្រះជន្មជាង៥០ហើយ។ អាត្មាមកនេះ តាមលិខិតនិមន្តដែលមិនច្បាស់លាស់ ថានឹងធ្វើអ្វីទេ តែអាត្មាឮថា ព្រះអង្គបណ្ឌិត ញៀម គិមតេង ចង់ជួបទ្រង់អង្គគ្រប់ព្រះអង្គអាត្មាក៏ចង់ជួបព្រះសង្ឃជាបណ្ឌិតខ្មែរដែរ ហើយក៏ចង់ដឹងដែរថា តើនឹងមានគម្រោងអ្វីខ្លះសម្រាប់ឆ្នាំនេះ ទើបអាត្មាមក ហើយអាត្មាមកនេះបានឃើញការយកសេចក្តីសម្រេចពីឆ្នាំមុនមកពិចារណា ហើយអនុវត្តន៍បន្តបំណងធ្វើរហូតបានសម្រេច ពីរបីឆ្នាំមកហើយ អាត្មាមិនដែលបានមកមប្រជុំទេ ដូចជានៅវត្តត្រៃកូដជាដើម តែលើកនេះអាត្មាឃើញមានសេចក្តីសម្រេចល្អៗ ដែលអាត្មានឹងនាំយកទៅផ្សព្វផ្សាយជាមួយពុទ្ធបរិស័ទជើងវត្តអាត្មា ដើម្បីភាព



រីកចំរើនរបស់ព្រះពុទ្ធសាសនា ។ អាត្មាយល់ថា "នៅពេលមកដល់សហរដ្ឋអាមេរិកនេះ ខ្លះក៏មកដោយសមាគម ខ្លះមកដោយគណកម្មការនៃតំបន់នីមួយៗ ខ្លះមកដោយអង្គការផ្សេងៗ ដែលធ្វើឱ្យគ្រប់គ្រងវត្តអារ៉ាម មិនដូចគ្នាពីវត្តមួយទៅវត្តមួយទៀត ហើយបន្ថែមពីនោះ ស្ថានភាពប្រទេស និងវប្បធម៌មិនដូចគ្នា កូនចៅក្រោយៗក៏មិនមានការអប់រំដូចគ្នា ដូច្នេះព្រះសង្ឃត្រូវការឯកភាពគ្នា ដើម្បីគ្រប់គ្រង រៀបចំលំអោនទៅឱនម៉ោ ដើរតាមឱ្យទាន់នូវសភាពការណ៍នាទីនេះ ដូចនេះយើងត្រូវឱ្យសហគមន៍ព្រះសង្ឃជាអ្នកស្វែងរកឯកភាព ហើយព្រះសង្ឃតាមតំបន់អាចយកទៅអនុវត្តន៍បាន ស្របតាមច្បាប់ ដោយមានការទទួលស្គាល់ពីរដ្ឋអាមេរិកផង ។ (**នៅមានតលេខក្រោយទៀត**)

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

● មានលក្ខណៈផ្ទុយអំពីការរស់នៅធម្មតាដែលយើងម្នាក់ៗតែងតែធ្វើ ប្រតិកម្មពុំចេះចប់ ដូចទឹកជ្រោះធ្លាក់គំហុកដូចគ្រាប់បែកផ្ទុះក្នុងសមរភូមិចំបាំង (ទម្លាប់ខ្វល់ខ្វាញ់បែបនេះ សង្គមបង្រៀនយើងតាំងពីតូចមក សមាធិបង្រៀនយើងឱ្យប្តូរផ្នត់គំនិតចាស់ៗ ហើយបំពាក់របៀបរស់នៅថ្មីឱ្យអ្នកប្រតិបត្តិ) ។

-ទី២. យើងបើកលំហផ្ទៃមេឃនៃចិត្តឱ្យធំទូលាយ បើកឱកាសឱ្យគំនិត អារម្មណ៍ រឿងរ៉ាវអាស្រូវ (ដែលយើងទប់បង្ខាំងលួចលាក់ទុកក្នុងចិត្តជាយូរមកហើយ) ឱ្យសំដែងចេញមកក្រៅដោយសេរី ។ គំនិត អារម្មណ៍ រឿងរ៉ាវទាំងនោះបានរួចចេញពីទ្រុងផុះអណ្តែតឡើងមកផ្ទៃលើនៃចិត្ត ហើយក៏រលាយបាត់ទៅ ផុះឡើងហើយរលាយបាត់ទៅជាច្រើនស្រទាប់ៗហូរហែ ។ បាតុភូតនេះញ៉ាំងឱ្យសម្អាតផ្លូវចិត្តពីមុនធ្លាប់តឹងតែង ត្រូវធូរស្រាលចុះជាលំដាប់ (នេះជាយន្តការលាងសំអាតផ្ទៃចិត្តមនុស្សឱ្យរួចផុតពីជាតិពិសពុលអតីតកាល - Psychological cleansing process) ។ បាតុភូតនេះខ្ញុំប្រៀបដូចជាទឹកកំពុងតែពុះកញ្ជ្រោលក្នុងកំសៀវ បង្កើតបានជាសម្ពាធស្ទើរផ្ទុះបង្ហៀរទឹកមកក្រៅ ។ បើយើងបើកគំរបកំសៀវ ទុំសម្ពាធនឹងថយចុះ ទឹកឈប់កញ្ជ្រោល ត្រឡប់មកកាន់ភាពស្ងប់ស្ងាត់ (ការបើកគ្របកំសៀវ ប្រៀបដូចជាវិធីទទួលយក ឬសុខចិត្តនេះឯង ដែលមានអត្ថន័យដ៏ជ្រាលជ្រៅ) ។ម្យ៉ាងទៀតការប្រើឧបករណ៍ការទទួលយក ឬការសុខចិត្តសំរាប់ដកអារម្មណ៍របស់យើងចេញពីចរន្តប្រតិកម្មរវាងម៉េម៉ូរី និងពិភពខាងក្រៅ ។ តាមពិតចរន្តប្រតិកម្មនេះ មានដំណើរជាស្វ័យប្រវត្តិពីក្នុងមកពីម៉េម៉ូរីមក យើងតែងយល់ច្រឡំថា របស់ទាំងអស់នោះ (ចិត្ត អារម្មណ៍ គំនិត មនោ-សញ្ចេតនា) ជារូបយើង ជារបស់យើង តាមពិតពុំមែនសោះ (សូមអានអត្ថបទខាងដើមអំពី «ខ្ញុំជានរណា?» នឹងកាន់តែយល់បន្ថែមអំពីការប្រកាន់ឥរិយាបថ ទទួលយក ឬសុខចិត្តនេះពុំមានផលវិបាកអ្វីឡើយ) ។

ក្នុងការរស់នៅជាក់ស្តែងចិត្តមនុស្សផ្ទុកដោយរូបភាពសព្វយ៉ាង កំហឹង ទុក្ខព្រួយ សប្បាយ រីករាយ ច្រណែន តប់ប្រមល់ អួលណែន ក្រៀមក្រំ លោភលន់ តម្រេកតណ្ហា ។ល។ នេះជាប្រការដែលមនុស្សគ្រប់ៗគ្នាមានជាកេរ្តិ៍ដំណែលសង្គមមនុស្សរាប់ជំនាន់មក វាពុំមែនជារបស់យើងផ្ទាល់ឡើយ វាជាហេតុការណ៍ ទោះចង់ឬមិនចង់តី វាត្រូវតែកើតមាន ។ អ្វីដែលសំខាន់នោះ គឺត្រូវចោទសួរខ្លួនយើងថា : តើសុខចិត្តឬទេ ? តើទទួលយកឬទេ ? ឧទាហរណ៍ ទុក្ខក្រៀមក្រំលេចមកដល់ ខ្ញុំសុខចិត្តទទួលយកទាំងអស់ ពុំប្រកែកប្រណាំងឡើយ ។ បើធ្វើដូច្នេះ តើមានអ្វីកើតឡើង ? ពេលនោះថាមពលក្នុងខ្លួនពុំត្រូវបានចំណាយខ្ជះខ្ជាយទៅក្រៅតទៅទៀត វាត្រូវនៅនឹងថ្កល់ ភាពស្ងប់កើតមានក្នុងខ្លួន បន្តមកភាពស្រណុកក្នុងចិត្តលេចមុខមក (Joyful life) ។ នេះជាគឺអាថ៌កំបាំងនៃគោលការណ៍ ។

ក្នុងព្រះពុទ្ធសាសនាយើង ការប្រតិបត្តិថ្វាយកាយនិងចិត្តជូនដល់ព្រះរតនៈត្រ័យ ព្រះពុទ្ធ ព្រះធម ព្រះសង្ឃ គឺជាវិធីបន្ថយឥទ្ធិពលបុគ្គល Ego បន្ថយប្រតិកម្មពីបុគ្គលធ្វើឱ្យធាតុបុគ្គលក្នុងខ្លួនតូចបំផុត សំរាប់បើកផ្លូវឱ្យសមាធិអាចដំណើរការបាន។ នេះជាចំណុចសំដែងឡើងនៃឥរិយាបថ «ការទទួលយក និងសុខចិត្ត» ដូចដែលខ្ញុំជំរាបខាងលើនេះស្រាប់។ ក្នុងសាសនាដទៃដូចជាព្រហ្មញ្ញសាសនា គ្រីស្តសាសនា រូបភាពនៃ «ការទទួលយក ការសុខចិត្ត» ស្តែងចេញការប្រតិបត្តិថ្វាយកាយនិងចិត្តដល់ព្រះអាទិទេព។

*** គោលការណ៍ «ពុំដើរតួ □ Non-identification »**

យើងធ្លាប់មើលល្ខោន ហើយសង្កេតឃើញអ្នកដើរតួឯក តួរង តួថ្លុក ។ ពួកគេសំដែងបានល្អណាស់។ តើអ្នកធ្លាប់បានចូលជ្រៅជាមួយតួអង្គឬទេ ? មែនពិតតួអង្គនីមួយៗ សុទ្ធតែមានតួអង្គពីរនាក់ក្នុងខ្លួន : (**មួយ**) គឺតួអង្គមនុស្សរស់នៅក្រៅរោងល្ខោន ។ តួនេះមានលក្ខណៈដូចយើងទាំងអស់គ្នា ។ គេដើរតួជាឪពុកម្តាយ ជាកូនដែលមានការអាណិតស្រឡាញ់ ភ័យ ព្រួយ ដូចយើងដូច្នោះឯង ។ នោះគឺជាតួអង្គពិតប្រាកដ រស់នៅក្នុងជីវិតសាមញ្ញ ។ (**ពីរ**) តួមួយទៀតគឺតួសំដែងក្នុងរឿងនីមួយៗ ដែលតែងតែប្រែប្រួលតាមសាច់រឿង ដែលអ្នកនិពន្ធកំណត់ឱ្យដើរតួ : ជូនគេដើរតួជាមនុស្សល្អ ស្លូតបូត មានធម៌មេត្តាករុណា អាណិតអាសូរ សន្តោសប្រណី ។ ជូនកាលគេជាមនុស្សកាចសាហាវ យង់ឃ្នង ខឹងក្រេវក្រោធ អាកប្បកិរិយាច្រងេងច្រងាង ។ល។

ការរៀបរាប់អំពីតួល្ខោននេះ សំរាប់ប្រៀបធៀបនឹងលក្ខណៈជាក់ស្តែងនៃបាតុភូតពិភពចិត្តមនុស្សយើងម្នាក់ៗ។ ដូចអ្នកបានដឹងសព្វគ្រប់អំពីកុងស្យេនិសពេលដឹងខ្លួន និងកុងស្យេនិសពេលយល់សប្តិ មនុស្សពិសោធន៍ឃើញលំហូរគំនិត មនោសញ្ចេតនា ប្រតិកម្មការរំជួលអារម្មណ៍ រលឹកនឹកឃើញ ការស្រមៃ ។ល។ លំហូរបាតុភូតទាំងអស់នោះ គឺជាឥទ្ធិពលនៃម៉េម៉ូរីរបស់មនុស្សយើងម្នាក់ៗប៉ុណ្ណោះ ឬមានន័យម្យ៉ាងទៀតថាមនុស្សប្រព្រឹត្ត ឬដើរតួតាមខ្សែញាក់របស់ម៉េម៉ូរី ដូចអាយ៉ង, ទីងមោងដូច្នោះឯង ។ ការដើរតួនេះ ប្រៀបដូចជាតួល្ខោនលើឆាក វាពុំមែនជាតួពិតប្រាកដឡើយ ។ ដូចដែលខ្ញុំបានបញ្ជាក់ក្នុងជំពូក «ខ្ញុំជានរណា?» ស្រាប់ តាមពិតតួអង្គពិតប្រាកដនៅខាងក្នុងបណ្តូលមនុស្ស ពោលគឺ កុងស្យេនិសដ៏បរិសុទ្ធនោះឯង ។

អាស្រ័យហេតុនេះ នៅពេលប្រតិបត្តិសមាធិ អ្នកទម្លាប់ប្រកាន់ឥរិយាបថ ពុំបណ្តោយឱ្យលំហូរបាតុភូតខាងក្រៅអូសទាញបាន ។ ជាក់ស្តែងបើកំពុងអង្គុយសមាធិ គំនិតមួយលេចមក អ្នកត្រូវដឹងខ្លួនថាអ្នកពុំមែនជាគំនិតនោះឡើយ វាជាចំណាំងស្រមោលពីម៉េម៉ូរីប៉ុណ្ណោះ អ្នកពុំដើរតួជាគំនិតនោះទៀតឡើយ អ្នកមាននាទីត្រឹមតែពិនិត្យវា ហើយព្រលែងវា Let it goes ។ គំនិតនោះៗគ្រាន់តែជាការផ្តល់យោបល់ប៉ុណ្ណោះ ពុំមែនជាបញ្ជាដាច់ណាត់ឡើយ ។

(នៅមានតលេខក្រោយទៀត)

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃអង្គារ ទី១៩ ខែមេសា ឆ្នាំ២០១១

# Grim Picture of Cambodia at Global Land Grab Talks

By Abby Seiff
THE CAMBODIA DAILY

Increasing foreign investment in Cambodian agriculture, flawed implementation of land laws and a lax attitude toward human rights are all contributing to an unsettling pace of land grabs, according to presentations released last week on the heels of the International Conference on Global Land Grabbing.

In a series of talks given at the conference—a three-day program held at the University of Sussex in the UK and organized by the Land Deals Politics Initiative—four presenters drew a stark image of Cambodian land governance.

A lack of "recourse through the judicial system," and "active involvement of local authorities—accepting bribes and as land brokers" allows for small-scale grabs of indigenous land, noted Jeremy Ironside of New Zealand's University of Otago in a presentation focused on communal lands in Ratanakkiri and Mondolkiri.

Roman Herre, an agriculture expert, highlighted the human rights violations inherent when land loss leads to food insecurity. Mr Herre called "loss of access to land (rice fields, forests, water, fishing grounds)" among the "immediate and most concrete violations." He, along with other presenters, fingered international investment as a root cause of illegitimate economic land concessions.

In an e-mail yesterday, Mr Herre noted that "despite its relatively small size globally," Cambodia cuts more economic concessions than any other country and is in the top five of total hectares awarded.

Pen Bonnar, Adhoc's Ratanakkiri coordinator said he agreed with the conclusions. "More and more companies are getting economic land concessions from the government," he said. "In the documents, they're told there's no impact to the people, and when they go in to clear the land, they have to evict." In Ratanakkiri alone, said Mr Bonnar, he knew of hundreds of villagers involved in disputes over land granted by the government to Vietnamese companies.

Beng Hong Socheat Khemro, deputy director general of the Land Management Ministry, said Sunday that in his opinion, government appropriation of in-use land was not an issue. "Normally, for the social and economic land concession, the government uses state private land. I don't understand what this has to do with villagers."

"The procedure is clearly stipulated in the sub-decree. As long as the government follows the sub-decree, it's fine."

But as for "individual cases, I cannot comment," he added.

# រូបភាពក្រៀមក្រំនៃកម្ពុជានៅឯកិច្ចពិភាក្សាស្តីពីការចាប់យកដីក្នុងសកលលោក

ដោយ Abby Seiff
THE CAMBODIA DAILY

កំណើនវិនិយោគទុនបរទេសក្នុងវិស័យកសិកម្មកម្ពុជាការអនុវត្តច្បាប់ដីធ្លីដែលមានគុណវិបត្តិ និងការពងើយកន្តើយចំពោះសិទ្ធិមនុស្សសុទ្ធតែរួមចំណែកដល់ការយកដីគួរឱ្យបារម្ភ នេះបើយោងតាមបទបង្ហាញដែលចេញកាលពីសប្តាហ៍មុន បន្ទាប់ពីសន្និសីទអន្តរជាតិស្តីពីការចាប់យកដីក្នុងសកលលោក ។

ក្នុងការពិភាក្សាបន្តបន្ទាប់នៅនេះឯសន្និសីទនេះកម្មវិធីរយៈពេលបីថ្ងៃដែលធ្វើឡើងនៅសាកលវិទ្យាល័យ Sussex នៅអង់គ្លេស និងរៀបចំដោយអង្គការ Land Deals Polities Initiative អ្នកធ្វើបទបង្ហាញបួននាក់បានរិះគន់យ៉ាងខ្លាំងចំពោះការគ្រប់គ្រងដីធ្លីកម្ពុជា ។

លោក Jeremy Ironside នៅសាកលវិទ្យាល័យ Otago ប្រទេសនូវែលសេឡង់ ក្នុងការបង្ហាញមួយផ្តោតលើដីឃុំក្នុងខេត្តរតនគិរី និងខេត្តមណ្ឌលគិរី បានកត់សំគាល់ថា ការខ្វះ "ឧបាស្រ័យតាមរយៈប្រព័ន្ធតុលាការ" និង "ការពាក់ព័ន្ធដ៏សកម្មនៃអាជាធរមូលដ្ឋាន ការទទួលយកសំណូក និងការធ្វើជាឈ្មួញកណ្តាលលក់ដី" អាចនាំឱ្យកើតមានការចាប់យកដីទ្រង់ទ្រាយតូចនៃដីអន្តោប្រវេសន៍ ។

Roman Herre អ្នកជំនាញខាងកសិកម្មបានគូសបញ្ជាក់អំពីការរំលោភសិទ្ធិមនុស្សដែលកើតឡើងជាធម្មតានៅពេលការបាត់បង់ដីនាំទៅរកអសន្តិសុខស្បៀងអាហារ ។ លោក Herre បានហៅ "ការបាត់បង់សិទ្ធិប្រើប្រាស់ដីធ្លី (វាលស្រែ ព្រៃឈើ ទឹក និងតំបន់នេសាទ" ថានៅក្នុងចំណោម "ការរំលោភដោយផ្ទាល់និងជាក់ស្តែងបំផុត" ។ លោករួមជាមួយនឹងក្រុមអ្នកធ្វើបទបង្ហាញផ្សេងទៀត បានចាត់ទុកការវិនិយោគអន្តរជាតិថាជាដើមហេតុនៃសម្បទានដីសេដ្ឋកិច្ចខុសច្បាប់ ។

ក្នុងអ៊ីមែលមួយកាលពីម្សិលមិញ លោក Herre បានកត់សំគាល់ថា "បើទោះជាវាមានទំហំតូចជាលក្ខណៈសកលក៏ដោយ" ក៏ប្រទេសកម្ពុជា ផ្តល់សម្បទានដីសេដ្ឋកិច្ចច្រើនជាប្រទេសផ្សេងទៀត ហើយស្ថិតក្នុងប្រទេសទាំង៥ ដែលផ្តល់ដីសម្បទានច្រើនបំផុត ។

លោក ប៉ែន ប៊ុណ្ណារ៍ អ្នកសម្របសម្រួលរបស់អង្គការសិទ្ធិមនុស្សអាដហុកនៅខេត្តរតនគិរី បានថ្លែងថា លោកយល់ស្របជាមួយការសន្និដ្ឋាននេះ។ លោកបានថ្លែងថា "ក្រុមហ៊ុនកាន់តែច្រើនកំពុងតែទទួលសម្បទានដីពីរដ្ឋាភិបាល។ នៅក្នុងឯកសារពួកគេត្រូវបានប្រាប់ថា គ្មានផលប៉ះពាល់ដល់ប្រជាជនឡើយ ហើយនៅពេលពួកគេចូលទៅរានដី ពួកគេបែរជាបណ្តេញទៅវិញ" ។ លោក ប៊ុណ្ណារ៍ បានថ្លែងថា គ្មានតែនៅក្នុងខេត្តរតនគិរីមួយ លោកដឹងថា មានអ្នកភូមិរាប់រយនាក់ ដែលពាក់ព័ន្ធក្នុងវិវាទដីធ្លី ដែលត្រូវបានផ្តល់ដោយរដ្ឋាភិបាលឱ្យទៅបណ្តាក្រុមហ៊ុនវៀតណាម ។

លោក បេង ហុងសុជាតិ ខេមរ៉ូ អគ្គនាយករងនៃក្រសួងនគរូបនីយកម្ម បានថ្លែងកាលពីថ្ងៃអាទិត្យនេះថា តាមទស្សនៈរបស់លោកការយកដីកំពុងប្រើស្រាប់របស់រដ្ឋាភិបាល គឺមិនជាបញ្ហាទេ។ "ជាធម្មតាសម្រាប់សម្បទានដីសង្គមកិច្ច និងសេដ្ឋកិច្ចរដ្ឋាភិបាលប្រើដីឯកជនរបស់រដ្ឋ។ ខ្ញុំមិនដឹងថាតើវាមានអ្វីពាក់ព័ន្ធជាមួយអ្នកភូមិទេ។ នីតិវិធីត្រូវបានចែងច្បាស់ក្នុងអនុក្រឹត្យ។ ឱ្យតែរដ្ឋាភិបាលអនុវត្តន៍តាមអនុក្រឹត្យនេះ វាមិនបញ្ហាទេ" ។ លោកបានមានប្រសាសន៍បន្ថែមទៀតថា ក៏បន្ថែចំពោះ "ករណីបុគ្គលិកវិញ ខ្ញុំមិនអាចធ្វើអត្ថាធិប្បាយបានឡើយ ៕

# Local Tourists Visit Provinces For New Year

By Hul Reaksmey
THE CAMBODIA DAILY

The number of domestic tourists visiting the coastal province of Preah Sihanouk last week to celebrate the New Year dropped more than 16 percent, to about 50,000 people, as more travelers chose to visit outlying provinces, officials said.

Soam Chenda, director of the Preah Sihanouk tourism department, said that, while the coastal area remained the most popular tourism destination over the period, more than 60,000 people had visited his province last year over the three-day holiday. "This year, local tourists went to different areas, including provinces in the northeast and Koh Kong," he said.

Tourism experts say improved infrastructure such as National Road 7 to Kratie and Stung Treng provinces has opened up areas of Cambodia that were before too hard to reach in such a short time. "There is better infrastructure in roads," said Ho Vandy, co-chair of a government-private working group on tourism policy, saying that provinces in the northeast and in Battambang and Pailin had lately developed as ecotourism destinations.

Nget Vitou, director of the tourism department in Ratanakkiri province, said the number of domestic tourists had risen 12.5 percent to 45,000 people between Thursday and Saturday compared to the same three days last year.

"Now we have a tarmac road, so people are flocking into the province," he said. By next year, there will be a 121-km tarmac road connecting Stung Treng province and Ratanakkiri that will encourage more domestic tourists to travel, he added.

In Siem Reap province, Cambodia's principal tourism hub, the number of national and international visitors entering the province reached 118,144 between Thursday and Friday, a rise of 3.36 percent compared to the same period the previous year, said Ngov Seng Kak, director of the provincial tourism department.

It is not just Cambodians who traveled more for the New Year. According to Khouy Kry, chief of the immigration police at the Bavet international checkpoint in Svay Rieng province, the number of entries from Vietnam, where many ethnic Khmer live, between Thursday and Saturday rose to 3,000, compared to just 1,000 last year.

# ភ្ញៀវទេសចរក្នុងស្រុកទៅកំសាន្តតាមបណ្តាខេត្តផ្សេងៗអំឡុងពិធីបុណ្យចូលឆ្នាំខ្មែរ

ដោយ ហ៊ុល រស្មី
THE CAMBODIA DAILY

ក្រុមមន្ត្រីបាននិយាយថា ចំនួនភ្ញៀវទេសចរក្នុងស្រុកដែលទៅកំសាន្តនៅខេត្តព្រះសីហនុនៅតំបន់ឆ្នេរកាលពីសប្តាហ៍មុនដើម្បីប្រារព្ធពិធីបុណ្យចូលឆ្នាំខ្មែរ បានធ្លាក់ចុះជា១៦ភាគរយមកនៅត្រឹមតែ ៥០.០០០នាក់ ដោយសារអ្នកធ្វើដំណើរកំសាន្តជាច្រើនជ្រើសរើសការកំសាន្តនៅតាមបណ្តាខេត្តឆ្ងាយៗ។

លោក សោម ចិន្តា ប្រធានមន្ទីរទេសចរណ៍ខេត្តព្រះសីហនុ បានមានប្រសាសន៍ថា ខណៈដែលតំបន់ឆ្នេរនៅតែជាទិសដៅទេសចរណ៍ដ៏ពេញនិយមបំផុតអំឡុងពេលពិធីបុណ្យ មនុស្សជាង ៦០.០០០នាក់ បានមកកំសាន្តក្នុងខេត្តរបស់លោកកាលពីឆ្នាំមុនអំឡុងពិធីបុណ្យរយៈពេល៣ថ្ងៃ។

លោកបានមានប្រសាសន៍ថា "នៅឆ្នាំនេះ ភ្ញៀវទេសចរក្នុងស្រុកបានធ្វើដំណើរទៅកាន់តំបន់ផ្សេងៗរួមទាំងខេត្តមួយចំនួននៅភាគឦសាន និងខេត្តកោះកុងផងដែរ" ។

អ្នកជំនាញផ្នែកទេសចរណ៍បាននិយាយថា ហេដ្ឋារចនាសម្ព័ន្ធប្រសើរជាងមុនដូចជា ផ្លូវជាតិលេខ៧ ទៅកាន់ខេត្តក្រចេះ និងស្ទឹងត្រែងបានបើកចំហតំបន់នានានៃប្រទេសកម្ពុជា ដែលពីមុនពិបាកទៅដល់ដោយប្រើរយៈពេលខ្លី ។

លោកហូ វណ្ណី សហប្រធាននៃក្រុមការងាររដ្ឋ និងឯកជនទទួលបន្ទុកផ្នែកគោលនយោបាយទេសចរណ៍បានមានប្រសាសន៍ថា "មានហេដ្ឋារចនាសម្ព័ន្ធផ្លូវថ្នល់ប្រសើរជាងមុន" ដោយបន្ថែមថា ខេត្តមួយចំនួននៅភាគឦសានព្រមទាំងខេត្តបាត់ដំបង និងខេត្តប៉ៃលិន ថ្មីៗនេះត្រូវបានអភិវឌ្ឍជាតំបន់ទេសចរណធម្មជាតិ ។

លោក ង៉ែត វិទូ ប្រធានមន្ទីរទេសចរណ៍ខេត្តរតនគិរី បានមានប្រសាសន៍ថា ចំនួនភ្ញៀវទេសចរណ៍ ក្នុងស្រុកបានកើនឡើង ១២.៥ ភាគរយដល់ ៤៥.០០០នាក់ចន្លោះពីថ្ងៃព្រហស្បតិ៍ដល់ថ្ងៃសៅរ៍ ប្រៀបធៀបរយៈពេល៣ថ្ងៃដូចគ្នាកាលពីឆ្នាំមុន ។

លោកបានមានប្រសាសន៍ថា "ឥឡូវនេះយើងមានផ្លូវកៅស៊ូ ដូច្នេះប្រជាពលរដ្ឋនាំគ្នាធ្វើដំណើរមកខេត្តនេះ" ។

លោកបានបន្ថែមថា នៅឆ្នាំក្រោយនឹងមានផ្លូវកៅស៊ូមួយខ្សែទៀតប្រវែង១២១គីឡូម៉ែត្រ ដែលភ្ជាប់ខេត្តស្ទឹងត្រែង និងខេត្តរតនគិរី ហើយនឹងលើកទឹកចិត្តភ្ញៀវទេសចរក្នុងស្រុកបន្ថែមទៀតឱ្យធ្វើដំណើរទៅកាន់ទីនោះ ។

លោក ង៉ូវ សេងកាក់ ប្រធានមន្ទីរទេសចរណ៍ ខេត្តសៀមរាប បានមានប្រសាសន៍ថា នៅក្នុងខេត្តសៀមរាប ដែលជាតំបន់ទេសចរណ៍ដ៏សំខាន់របស់កម្ពុជា ចំនួនភ្ញៀវទេសចរណ៍ជាតិ និងអន្តរជាតិធ្វើដំណើរមកកាន់ខេត្តនេះបានកើនដល់ ១១៨.១៤៤នាក់ ចាប់ពីថ្ងៃព្រហស្បតិ៍ដល់ថ្ងៃសុក្រ គឺកើន៣.៣៦ភាគរយបើប្រៀបធៀបរយៈពេលដូចគ្នាកាលពីឆ្នាំមុន។

មិនមែនតែប្រជាជនកម្ពុជាប៉ុណ្ណោះទេ ដែលធ្វើដំណើរច្រើននៅអំឡុងបុណ្យចូលឆ្នាំខ្មែរនោះ។ យោងតាមលោក ខួយ គ្រី ដែលជាប្រធាននគរបាលអន្តោប្រវេសន៍នៅច្រកត្រួតពិនិត្យអន្តរជាតិបាវិតក្នុងខេត្តស្វាយរៀងបានឱ្យដឹងថា ចំនួនអ្នកធ្វើដំណើរមកពីវៀតណាម រវាងថ្ងៃព្រហស្បតិ៍និងថ្ងៃសៅរ៍បានកើនដល់៣.០០០នាក់បើប្រៀបធៀបនឹងឆ្នាំមុនមានត្រឹមតែ ១.០០០នាក់ ៕

តមកទំព័រទី ០១

## ឆ្លាក់ឆ្នាំថ្មីឱ្យត្រូវតាមការស្រមៃ..

ឬក៏បានជួបជុំគ្រួសារ គូរស្នេហ៍ បញ្ចៀសគ្រប់មារសត្រូវ ហើយតិចតួចណាស់ដែលបន់ស្រន់រកដំណោះស្រាយកាចសាហាវ ដូចជាប្រាថ្នាឱ្យមនុស្សណាវលាយរលត់ ក្ស័យទុន ឬស្លាប់តៃហោង ឬព្រាត់ប្រាស់គ្រួសារ...។ ដើម្បីការបន់ស្រន់សុំសេចក្ដីប្រាថ្នាកើតផលសម្រេច ពុទ្ធសាសនិទាំងអស់បានយកព្រះពុទ្ធរូបទៅឧទ្ទិសឋាន សុំព្រះពរពីព្រះនាងម្ចាស់បុត្រី






នៃព្រះឥន្ទ្រាធិរាជ តំណាងឱ្យព្រហ្មញ្ញសាសនា ដែលវប្បធម៌លាយគ្នានេះ បានចាប់បដិសន្ធិតាំងពីកំណើតនៃគ្រិស្ដសករាជមក ពុំអាចនរណាម្នាក់អាចពន្យល់ថា ដំណើរនៃវប្បធម៌ចម្រុះពណ៌នេះគ្មានប្រសិទ្ធភាពសោះទេនោះបានឡើយ ។ ម្លោះហើយនៅតាមទ្វារចូល ឬនៅមុខផ្ទះនីមួយៗ តុតាំងពិធីទទួលទេវតាថ្មីបានរៀបចំប្រណីតខុសៗគ្នា ដើម្បីទាក់ទាញអង្គទេវតា ឱ្យចុះមកប្រសិទ្ធពរជម្រកគ្រួសារខ្លួន ។

ពីមួយឆ្នាំទៅមួយឆ្នាំ ពិធីរសន់របស់ពលរដ្ឋរាប់ម៉ឺនសែននាក់ បានឆ្លាក់រូបភាពនៃក្ដីស្រមៃរបស់មនុស្សឱ្យបានជាគម្រោងអនាគតជីវិតរបស់ខ្លួនដែលនឹងមានភាពប្រសើរឡើងជាមុនជាជវាប តែលក្ខខណ្ឌនេះ ពុំអាចកើតឡើងដោយគ្មានការត្រៀមទទួលស្ថានភាពថ្មីដែលនឹងមកដល់នោះទេ។ រង្វាន់ឬជំនូនដល់មិត្តភ័ក្រ្ត កូនចៅនាឱកាសដ៏សំខាន់នោះនឹងផ្ដល់នូវភាពរាប់អាន ស្រឡាញ់កាន់តែខ្ពស់ តែក៏ត្រូវនឹកគិតត្រៀមរង់ចាំឱកាសលំបាកដែលនឹងមកដល់ ដោយមិនធ្វើជំនូន ឬធ្វើបុណ្យឱ្យលើសពីចំនួនសម្បត្តិដែលនឹងត្រូវការជាចាំបាច់សម្រាប់គ្រួសារខ្លួនរស់នៅនោះឡើយ ។ បើលាភមិនទាន់មកដល់ គេនៅតែត្រូវត្បិតត្បៀតសន្សំសំចៃ បើលាភមកដល់ក៏ត្រូវត្រៀមរៀបថែសម្បត្តិនោះឱ្យគង់វង្ស រៀបគម្រោងបង្កើនគុណភាពនៃជីវិតដោយមិនគិតងាយ។ ដោយឡែកផ្សេងទៀត បើគេផ្សងឱ្យជួបតែគូរព្រេងឬមនុស្សល្អ ក៏គេត្រូវត្រៀមខ្លួនឱ្យទៅជាមនុស្សបរិសុទ្ធ សុច្ចរិតគួរឱ្យសេពគប់ ជាមនុស្សចេះសំអាត

(តទៅទំព័រទី ១៦)

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃអង្គារ ទី១៩ ខែមេសា ឆ្នាំ២០១១

# P Sihanouk Prison Guard Allegedly Rapes Girl, 3

By Sok Sidon
THE CAMBODIA DAILY

A 22-year-old guard at Preah Sihanouk Provincial Prison was arrested yesterday for allegedly raping a 3-year-old girl who was playing outdoors on the prison grounds earlier in the day, police said.

Morm Sidora, 22, allegedly brought the young daughter of a fellow guard into a prison watchtower and raped her there at about 7 am, said Be Sivanna, chief of anti-human trafficking and juvenile protection for the Preah Sihanouk provincial police.

"The suspect is a prison guard, so [he] should have known the result of his act. I wonder so much why he did this to a small girl," Mr Sivanna said. "It is too ridiculous. I am speechless."

During questioning, Mr Sidora only confessed to forcing the young girl to touch his penis, Mr Sivanna said, adding that the child had been sent to a doctor for a medical examination.

The victim's mother heard her cries and followed them to the watchtower, where she allegedly found Mr Sidora in the act of raping her daughter, he said. The girl's father then reported the alleged crime to Sam Sophal, deputy director of Preah Sihanouk prison, he added.

Mr Sophal said that after receiving the report from the victim's family, he held Mr Sidora in the prison until police arrived to take him away.

"I do not take sides with anyone," Mr Sophal said. "I gave the case to the police to solve according to the law."

Cheap Sotheary, Preah Sihanouk provincial coordinator for rights group Adhoc, said that rapes reported to Adhoc had increased this year compared to the same period in 2010. From January to April this year, Adhoc recorded five rape cases, including yesterday's alleged rape and the rape of a 4-year-old, Ms Sotheary said, adding that Adhoc recorded 15 rapes in Preah Sihanouk in the whole of last year.

"We do not know the root cause of it yet. I've found that most crimes were committed against close neighbors, villagers and friends," she said.

The Cambodia Daily has reported 59 child rapes so far this year.

# ឆ្មាំពន្ធនាគារព្រះសីហនុរំលោភក្មេងស្រីអាយុ៣ឆ្នាំ

ដោយ សុខ ស៊ីដន
THE CAMBODIA DAILY

នគរបាលបាននិយាយថា ឆ្មាំអាយុ២២ឆ្នាំម្នាក់នៅពន្ធនាគារខេត្តព្រះសីហនុ ត្រូវបានចាប់ខ្លួនកាលពីម្សិលមិញ ដែលតាមចោទថា បានចាប់រំលោភក្មេងស្រីអាយុ៣ឆ្នាំម្នាក់ដែលកំពុងតែលេងនៅក្រៅក្នុងបរិវេណពន្ធនាគារនៅថ្ងៃដដែលនោះ ។

លោក បេ ស៊ីវណ្ណា នាយកការិយាល័យប្រឆាំងការជួញដូរមនុស្ស និងការពារអនីតិជននៃស្នងការដ្ឋាននគរបាលខេត្តព្រះសីហនុ បានថ្លែងថា ឈ្មោះ ម៉ម ស៊ីដូរ៉ា អាយុ២២ឆ្នាំ តាមចោទថា បាននាំកូនស្រីក្មេងរបស់ឆ្មាំដូចគ្នាម្នាក់ចូលក្នុងប៉មយាមពន្ធនាគារមួយ ហើយរំលោភនាងនៅទីនោះនៅម៉ោងប្រហែល៧ព្រឹក ។

លោក ស៊ីវណ្ណា បានថ្លែងថា "ជនសង្ស័យនេះគឺជាឆ្មាំគុកដូចគ្នា(គាត់) គួរតែដឹងលទ្ធផលនៃទង្វើរបស់ខ្លួន។ ខ្ញុំឆ្ងល់ណាហេតុអ្វីគាត់ធ្វើដូច្នេះចំពោះក្មេងស្រីតូចម្នាក់។ វាហួសហេតុពេកហើយ។ ខ្ញុំរកនិយាយមិនចេញទេ"។

លោក ស៊ីវណ្ណា បានថ្លែងថា អំឡុងពេលសួរចម្លើយ ស៊ីដូរ៉ា គ្រាន់តែសារភាពថា ខ្លួនបានបង្ខំឱ្យក្មេងស្រីរូបនេះកាន់លិង្គរបស់តែប៉ុណ្ណោះ ដោយលោកបន្ថែមថា កុមារីនេះត្រូវបានបញ្ជូនទៅវេជ្ជបណ្ឌិតម្នាក់ដើម្បីធ្វើកោសល្យវិច័យ។ លោកបានថ្លែងថា ម្ដាយរបស់ជនរងគ្រោះបានឮនាងស្រែកហើយតាមរកប្រភពសម្លេងស្រែកដល់ប៉មយាមជាទីដែលអ្នកស្រីបានឃើញ ស៊ីដូរ៉ា កំពុងតែរំលោភកូនរបស់ខ្លួន។ លោកបានបន្ថែមថា ឪពុករបស់ជនរងគ្រោះបន្ទាប់នោះបានរាយការណ៍អំពីបទល្មើសនេះទៅលោក សំ សុផល អនុ-ប្រធានពន្ធនាគារព្រះសីហនុ។

លោក សុផល បានថ្លែងថា បន្ទាប់ពីទទួលបានសេចក្ដីរាយការណ៍ពីគ្រួសារជនរងគ្រោះលោកបានឃុំខ្លួន ស៊ីដូរ៉ា ក្នុងពន្ធនាគាររហូតដល់នគរបាលមកដល់យកជននេះចេញទៅ។ លោក សុផល បានថ្លែងថា "ខ្ញុំមិនកាន់ខាងណាទេ។ ខ្ញុំបានប្រគល់ករណីនេះទៅឱ្យប៉ូលិសដើម្បីដោះស្រាយតាមច្បាប់"។

លោកស្រី ជៀព សុធារី អ្នកសម្របសម្រួលរបស់អង្គការសិទ្ធិមនុស្សអាដហុកនៅខេត្តនេះ បានថ្លែងថា ការរំលោភដែលត្រូវបានរាយការណ៍មកអាដហុក បានកើនឡើងនៅឆ្នាំនេះ បើធៀបនឹងអំឡុងពេលដូចគ្នាក្នុងឆ្នាំ២០១០។ លោកស្រី សុធារី បានថ្លែងថា ចាប់ពីខែមករាដល់ខែមេសាឆ្នាំនេះអង្គការអាដហុក បានកត់ត្រាទុកនូវការរំលោភបានចំនួន៥ករណី រួមទាំងការរំលោភកាលពីម្សិលមិញ និងការរំលោភក្មេងស្រីអាយុ៤ឆ្នាំម្នាក់ផង ដោយលោកស្រីបន្ថែមថា អាដហុក បានកត់ត្រាការរំលោភចំនួន១៥ក្នុងខេត្តព្រះសីហនុកាលពីឆ្នាំទៅ។ លោកស្រីថ្លែងថា "យើងមិនដឹងអំពីមូលហេតុដើមរបស់វានៅឡើយទេ។ ខ្ញុំយល់ថាបទល្មើសច្រើនបំផុតនោះ ត្រូវបានប្រព្រឹត្តចំពោះអ្នកជិតខាង អ្នកភូមិ និងមិត្តភក្តិជិតស្និទ"។ កាសែត ឌឹ ខេមបូឌា ដេលី បានរាយការណ៍អំពីការរំលោភកុមារចំនួន៥៩ ករណីហើយមកទល់ពេលនេះនាឆ្នាំនេះ ៕

# Mu Sochua Immunity Bid Rejected by Assembly

The National Assembly has rejected a request from SRP lawmakers to restore the parliamentary immunity of party member Mu Sochua, according to an April 12 letter from Assembly President Heng Samrin. Parliament lifted Ms Sochua's immunity in 2009 during her legal battle with Prime Minister Hun Sen. She was convicted of defaming the premier last year and had the last of her fine deducted from her parliamentary salary in November. SRP lawmakers asked Parliament to restore her immunity on April 1. "I tell you that the Assembly does not have the ability to review [this case] or give immunity back because Mu Sochua did not complete the court rehabilitation yet," Mr Samrin's letter reads. The letter also cites Article 535 of the Criminal Procedures Code, which spells out a one-year wait for lawmakers convicted of petty crimes. SRP Secretary-General Ke Sovannroth yesterday confirmed receipt of the letter but insisted that Ms Sochua still had the right to demand her immunity back, because the legal basis for stripping it in the first place was questionable. Ms Sochua is traveling in the US and could not be reached for comment. *(Eang Mengleng)*

# សភាច្រានចោលសំណើសុំផ្ដល់អភ័យឯកសិទ្ធិរបស់លោកស្រី មូរ សុខហួរ

ដោយ អ៊ាំង ម៉េងឡេង
THE CAMBODIA DAILY

យោងតាមលិខិតមួយចុះកាលបរិច្ឆេទកាលពីថ្ងៃទី១២ ខែមេសា ពីលោក ហេង សំរិន ជាប្រធានរដ្ឋសភាបានឱ្យដឹងថា រដ្ឋសភាបានច្រានចោលសំណើរបស់ក្រុមសមាជិកសភាគណបក្ស សម រង្ស៊ី ដែលសុំឱ្យផ្ដល់អភ័យឯកសិទ្ធិសភារបស់លោកស្រី មូរ សុខហួរ ដែល ជាសមាជិកគណបក្ស សម រង្ស៊ី វិញ។ រដ្ឋសភាបានដកអភ័យឯកសិទ្ធិរបស់លោកស្រី មូរ សុខហួរ ក្នុងឆ្នាំ២០០៩ អំឡុងពេលលោកស្រីតស៊ូតាមផ្លូវច្បាប់ជាមួយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន។ លោកត្រូវបានតុលាការផ្ដន្ទាទោសពីបទបរិហារកេរ្ដិ៍លោកនាយករដ្ឋមន្ត្រីកាលពីឆ្នាំមុន ហើយប្រាក់ពិន័យចុងក្រោយរបស់អ្នកស្រីត្រូវបានកាត់ពីប្រាក់ខែសភារបស់លោកស្រីនៅក្នុងខែវិច្ឆិកា។ ក្រុមសមាជិកសភាគណបក្ស សម រង្ស៊ី បានស្នើសុំរដ្ឋសភាឱ្យផ្ដល់អភ័យឯកសិទ្ធិរបស់អ្នកស្រីវិញ កាលពីថ្ងៃទី១ ខែមេសា។ លិខិតរបស់លោក ហេង សំរិន មានខ្លឹមសារថា "ខ្ញុំសូមប្រាប់អស់លោកថា រដ្ឋសភាគ្មានសមត្ថភាពពិនិត្យ (រឿងក្ដីនេះ) ឬប្រគល់អភ័យឯកសិទ្ធិឱ្យវិញនោះទេ ពីព្រោះលោកស្រី មូរ សុខហួរ មិនទាន់បានបំពេញនីតិសម្បទារបស់តុលាការនៅឡើយទេ"។ លិខិតនេះក៏បានលើកឡើងពីមាត្រា ៥៣៥នៃក្រមនីតិវិធីព្រហ្មទណ្ឌដែលចែងយ៉ាងច្បាស់អំពីការរង់ចាំរយៈពេលមួយឆ្នាំសម្រាប់សមា-ជិកសភាដែលត្រូវបានតុលាការផ្ដន្ទាទោសពីបទលហុ។ កាលពីម្សិលមិញលោកស្រី កែ សុវណ្ណរតន៍ ដែលជាអគ្គលេខាធិការរបស់គណបក្ស សម រង្ស៊ី បានបញ្ជាក់ថា បានទទួលលិខិតនេះមែន ប៉ុន្តែបានអះអាងថា លោកស្រី មូរ សុខហួរ នៅតែមានសិទ្ធិទាមទារអភ័យឯកសិទ្ធិរបស់លោកស្រីមកវិញ ពីព្រោះមូលដ្ឋានច្បាប់សម្រាប់ការដកអភ័យឯកសិទ្ធិ គឺគួរឱ្យសង្ស័យ។ ពេលនេះលោកស្រី មូរ សុខហួរ កំពុងស្ថិតនៅក្នុងសហរដ្ឋអាមេរិក ហើយមិនអាចទាក់ទងបានទេ ៕

# B'bang Man Bludgeons Son to Death With Bamboo Stick

Battambang Provincial Court yesterday charged a Kamrieng district man with murder and placed him in provisional detention after he allegedly killed his son in a drunken rage, provincial anti-human trafficking police chief Koy Heang said. Sann Kong, 42, was arrested by Kamrieng district police on Saturday after allegedly murdering his 13-year-old son, Kong Ngor, by striking him on the head three times with a bamboo stick. According to deputy district police chief Chor Koeun, the father attacked the boy when the child refused to fetch him water from a nearby well late at night. The suspect had consumed about 2 liters of rice wine when the incident occurred. "The offender is addicted to wine," Mr Koeun said. "He went to drink rice wine in the village since morning and went back at nighttime, making his son stay alone on the farmland without food." He added that the boy's mother had died many years ago and that the family was quite poor. *(Saing Soenthrith)*

# បុរសម្នាក់នៅខេត្តបាត់ដំបងយកដំបងឫស្សីវាយកូនប្រុសរបស់ខ្លួនរហូតដល់ស្លាប់

ដោយ សាំង សុឥន្ទរិទ្ធ
THE CAMBODIA DAILY

លោក កុយ ហៀង នាយកការិយាល័យប្រឆាំងការជួញដូរមនុស្ស និងការពារអនីតិជននៃស្នងការនគរបាលខេត្តបានមានប្រសាសន៍ថា កាលពីម្សិលមិញតុលាការខេត្តបាត់ដំបងបានចោទប្រកាន់បុរសម្នាក់នៅក្នុងស្រុកកំរៀងពីបទមនុស្សឃាត ហើយកំពុងស្ថិតក្នុងការឃុំខ្លួនបណ្ដោះអាសន្ន បន្ទាប់ពីតាមចោទថា បុរសរូបនេះបានសម្លាប់កូនប្រុសរបស់ខ្លួននៅក្នុងអំពើទាំងគំរលមួយដែលបណ្ដាលមកពីការស្រវឹងស្រា។ បុរសឈ្មោះ សាន់ គង់ អាយុ៤២ ឆ្នាំត្រូវបាននគរបាលស្រុកកំរៀងចាប់ខ្លួនកាលពីថ្ងៃសៅរ៍ បន្ទាប់ពីតាមចោទថា បានសម្លាប់កូនប្រុសរបស់ខ្លួនអាយុ១៣ឆ្នាំ ឈ្មោះ គង់ ង៉ោ ដោយវាយក្បាលក្មេងប្រុសរូបនេះនឹងដំបងឫស្សីចំនួន៣ដំបង។ យោងតាមលោក ជ គឿន អធិការរងនគរបាលស្រុកបានឱ្យដឹងថា បុរសជាឪពុកបានវាយក្មេងប្រុសនេះ នៅពេលវាមិនព្រមទៅដងទឹកអណ្ដូងនៅក្បែរនោះ មកឱ្យគាត់នៅពេលយប់ជ្រៅ។ ជនសង្ស័យបានផឹកស្រាសអស់ប្រហែល២លីត្រនៅពេលដែលឧប្បត្តិហេតុបានកើតឡើង។ លោក ជ គឿន បានមានប្រសាសន៍ថា "ជនល្មើសរូបនេះញៀនស្រា។ គាត់បានទៅផឹកស្រាសនៅក្នុងភូមិចាប់តាំងពីពេលព្រឹក ហើយបានត្រឡប់មកផ្ទះវិញនៅពេលយប់ជ្រៅដោយទុកឱ្យកូនប្រុសរបស់គាត់នៅតែម្នាក់ឯងដោយគ្មានម្ហូបអាហារបរិភោគ"។ លោកបានបន្ថែមថា ម្ដាយរបស់ក្មេងប្រុសរូបនេះបានស្លាប់ជាច្រើនឆ្នាំមកហើយ ហើយថាគ្រួសារនេះក្រីក្រណាស់ ៕




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

បានគួសវាសពីនយោបាយថៃ ចំពោះឥណ្ឌូចិន ស្ដីអំពី "តំបន់សង្គ្រាម និងតំបន់សេដ្ឋកិច្ចរបស់ឥណ្ឌូចិន"។

**•២៩-៣០ មេសា** : ប្រជុំមហាសន្និបាតវិសាមញ្ញនៃរដ្ឋសភាដើម្បីកែទម្រង់រដ្ឋធម្មនុញ្ញសាធារណរដ្ឋប្រជាមានិតកម្ពុជា បានត្រូវលប់ចោល ជំនួសដោយឈ្មោះរដ្ឋកម្ពុជា ដែលមានបទនគររាជ និងទង់ជាតិថ្មីត្រូវបានអនុម័ត។ ទោសប្រហារជីវិតបានត្រូវលប់ចោល។ សាសនាព្រះពុទ្ធជាសាសនារបស់រដ្ឋ។ សម្បត្តិឯកជន និងសេដ្ឋកិច្ចទីផ្សារត្រូវបង្កើតឡើងវិញ។ អ្វីៗដែលជាកំអែលនៃរបបសង្គមនិយម បានត្រូវលប់បំបាត់ពីរដ្ឋធម្មនុញ្ញ ហើយរដ្ឋកម្ពុជាប្រកាសយកមាគ៌ាអព្យាក្រិត្យ និងមិនចូលបក្សសម្ព័ន្ធ។ នេះជាការបន្ទន់ឥរិយាបថទីពីររបស់ ហ៊ុន សែន ថ្វាយចំពោះ សីហនុ កាលពីចុងខែមីនា។ ចលនានៃចលនាសេរីនិយមបានបក់ឡើង គឺជារដូវផ្ការីកនៅកម្ពុជា។

**•២-៣ ឧសភា** : ជំនួប សីហនុ-ហ៊ុន សែន នៅយ៉ាកាតា : ព្រមព្រៀងពីយន្តការអន្តរជាតិ សម្រាប់ត្រួតពិនិត្យការដកទ័ពវៀតណាម ពីកិច្ចប្រជុំសន្និសីទពីជំនួប សីហនុ-ហ៊ុន សែន ម្ដងទៀតនៅប៉ារីស ថ្ងៃទី២៤ កក្កដា និងកិច្ចប្រជុំចតុភាគីថ្ងៃទី២៥ ខែកក្កដា។ បន្ទាប់ពីជំនួប សីហនុ-ហ៊ុន សែន ជាមួយ សឺង សាន។

**•៤ ឧសភា** : សីហនុ បង្ហាញពីការវត្តន៍យ៉ាងច្រើន ហើយឱ្យយោបល់វិជ្ជមានលើការផ្លាស់ប្ដូរក្នុងរដ្ឋធម្មនុញ្ញ។

**•៦ ឧសភា** : ជំនួប ហ៊ុន សែន-ឆាតទីឆាយ នាយករដ្ឋមន្ត្រីថៃ នៅបាងកក ព្រមព្រៀងឱ្យមានការឈប់បាញ់គ្នាមុនពេលដកទ័ពវៀតណាមឱ្យអស់ពីកម្ពុជា ។នៅភ្នំពេញបំរាមគោចរពីម៉ោង១០យប់ដល់ម៉ោង៥ភ្លឺ បានត្រូវដកចេញ ។

**•៧ ឧសភា** : ខ្មែរក្រហមបំផ្ទុះផ្ដាច់ស្ពានពីនៅលើផ្លូវភ្នំពេញ-បាត់ដំបង។

**•១៧ ឧសភា** : សីហនុ បានសុំឱ្យគេផ្ដល់វេឈ្មោះខ្មែរអ្នករស់នៅបរទេស ដែលចេញចូលភ្នំពេញ ។

**•១៨ ឧសភា** : កិច្ចប្រជុំចិន-សូវៀត នៅប៉េកាំង ប្រទេសទាំងពីរយល់ថា បន្ទាប់ពីទ័ពវៀតណាមចេញអស់ពីកម្ពុជានាខែកញ្ញា ជំនួយទៅភាគីទាំងអស់នៃកម្ពុជា ត្រូវបានបន្ថយ ដើម្បីទប់ស្កាត់សង្គ្រាមស៊ីវិល ហើយលើកដំកើងការរួបរួមជាតិ។

**•១ មិថុនា** : ជំនួបរដ្ឋមន្ត្រីការបរទេសបារាំង រ៉ូឡង់ ឌុយម៉ាស និងឥណ្ឌូនេស៊ី អាលី អាឡាតាស នៅប៉ារីស។ កិច្ចប្រជុំសន្និសីទអន្តរជាតិ នឹងត្រូវបើកនៅដើមខែសីហា ប្រសិនបើមានការវិវត្តន៍ល្អនៅកិច្ចប្រជុំចតុភាគីខ្មែរ។

**•១៦ មិថុនា** : ប្រទេសថៃ ជួសជុលផ្លូវដែកដែលភ្ជាប់ អារញ្ញប្រាថេត ទៅទល់ដែលខ្មែរ។

**•២០-២៣ មិថុនា** : ជួបគ្នាជាថ្មីរវាងបារាំងនិងវៀតណាម។ ទស្សនកិច្ចនៃរដ្ឋមន្ត្រីការបរទេសវៀតណាម ង្វៀង កូថាច់ ទៅប៉ារីស ជួបជាមួយនឹងប្រធានាធិបតី ហ្វ្រង់ស្វា មីតេរ៉ង លោកនាយករដ្ឋមន្ត្រី មីសែលរ៉ូកា និងរដ្ឋមន្ត្រី១០រូបទៀត។

**•២៥ មិថុនា** : នៅព្យុងយ៉ាង សម្ដេច សីហនុ គម្រាមថា "នឹងមិនចូលរួមក្នុងសន្និសីទអន្តរជាតិ ប្រសិនបើប្រទេសមហាអំណាចនៅតែកាន់ជើងរបបភ្នំពេញ" ព្រះអង្គស្វែងយល់ថា ប្រទេសមហាអំណាចមិនចាត់ទុកព្រះអង្គជាអ្នកពិគ្រោះតែមួយអង្គឯងលើបញ្ហាកម្ពុជា។

**•២៧ មិថុនា** : ដោយសន្និដ្ឋានថា ជនភៀសខ្លួនប្រមាណ៧០០នាក់ សុទ្ធសឹងស្ថិតក្រោមការដឹកនាំរបស់មេដឹកនាំនយោបាយរបស់គេនោះ ។ កងពលថៃឡង់ សម្រេចថាបញ្ជូនជនទាំងនោះឱ្យត្រឡប់ចូលក្នុងជំរំខ្មែរក្រហមឡើងវិញ ក្រោយពីពួកគេបានរត់ចេញមកកាលពីមុននេះបន្តិច ។

**•៥ កក្កដា** : នៅក្រុងប៉េកាំងឯណោះវិញ សម្ដេច សីហនុ បានទាញយកជាប្រយោជន៍នយោបាយមួយដោយរុញបង្ខំ អ.ស.ប (ONU) ឱ្យត្រួតពិនិត្យការដកទ័ពទាហានវៀតណាម ដោយបង្ខំឱ្យកម្ពុជាប្រជាមានិត្យ ត្រូវតែបំបែកការគ្រប់គ្រងរបស់ខ្លួនរួចរៀបចំខ្លួនជារដ្ឋាភិបាល និងកងទ័ពរួមដោយមានភាគីជាមួយក្រុម មានទាំងក្រុមខ្មែរក្រហមផង។ ព្រះមហាក្សត្រខ្មែរពុំទទួលស្គាល់រដ្ឋធម្មនុញ្ញថ្មីនៃរដ្ឋកម្ពុជា ហើយបានទាំងព្រមានថា មានទ័ពវៀតណាមចំនួន ៣០.០០០នាក់ស្ថិតក្នុងជួរកងទ័ពរដ្ឋាភិបាលក្រុងភ្នំពេញ ហើយនិងយុវជនវៀតណាមប្រមាណ ១០០.០០០នាក់ ក្រោមឯកសណ្ឋានជារដ្ឋករអត្តិសនីកម្ពុជា ព្រមទាំងជនអន្តោប្រវេសន៍វៀតណាមខុសច្បាប់ប្រមាណជា ១លាននាក់ទៀត។ អតីតប្រមុខរដ្ឋខ្មែរ បានបង្ខំទៀតថា ឱ្យមានសេចក្ដីសម្រេចអនុម័តជាឯកច្ឆ័ន្ទនៅពេលប្រជុំអន្តរជាតិក្រុងប៉ារីសទៀតផង។

**•១៨ កក្កដា** : សិក្ខាសាលាស្ដីពីការសម្លាប់រង្គាលដោយខ្មែរក្រហម បានកើតឡើងនៅភ្នំពេញ ។

**•២០ កក្កដា** : នៅឯទីក្រុងវ៉ាស៊ីនតោនឯណោះវិញ សភាអាមេរិកាំងបានការផ្ដល់សម្ភារៈដល់ក្រុមបក្សសម្ព័ន្ធមិនមែនកុម្មុយនីស្ត នៅក្នុងជំរំខ្មែរក្រហមវិញ ។ គ្រូបង្វឹក និងគ្រូបង្រៀនអាមេរិក អង់គ្លេស បានផ្ដល់ការបង្រៀនយុទ្ធវិធីទ័ព ។

**•២១ កក្កដា** : នៅទីក្រុងប៉ារីស សម្ដេច សីហនុ ស្នើសុំឱ្យការបញ្ចុះចំនួនពលទាហានឱ្យមកត្រឹមតែ ១០.០០០នាក់ និងមានការត្រួតពិនិត្យការដកទ័ពវៀតណាមដោយអង្គការសហប្រជាជាតិ និងការរៀបចំការបោះឆ្នោតសកលដោយរដ្ឋាភិបាលមួយដែលមានរដ្ឋបាលចម្រុះដោយភាគីទាំងបួន។ ហើយ ដែលបក្សសម្ព័ន្ធនីមួយៗស្មើភាពទាំងអំណាច និង សិទ្ធិរបស់គេនីមួយៗ។ "ការទាត់ចោលក្រុមខ្មែរក្រហម នឹងអាចនាំទៅរកផលពិបាកដែលអាចសម្លាប់ព្រះរាជាណាចក្រកម្ពុជា គឺវានឹងពុំអាចមានសន្តិភាពណាមួយទេ"។

**•២៤ កក្កដា** : ក្រោយពីការជួបជុំប្រាំលើករួចមកការចរចារវាង សម្ដេច សីហនុ និង ហ៊ុន សែន បានឈានទៅដល់ការយល់ស្របគ្នាថា "មានការរាំងស្ទះទាំងអស់"។ ស្ដេច សីហនុ ចោទថា ហ៊ុន សែន ជាអ្នកប្រឆាំងការបង្កើតពហុបក្ស។ រីឯ ហ៊ុន សែន ចោទប្រកាន់ សីហនុ ថា ដើរទៅមុខតែមួយជំហាន ហើយត្រឡប់ក្រោយវិញដល់ទៅពីរជំហាន ព្រមទាំងចោទប្រកាន់ ONU ថាជាម្ចាស់នៃការរាំងស្ទះក្នុងការសន្តិភាពនេះតាំងពីឆ្នាំ១៩៧៩មក ។

(នៅមានតលេខក្រោយទៀត)




# ពុទ្ធប្បវត្តិអមដោយរូបភាព

# A Pictorrial Biography of Saky amuni Buddha

- ❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- ❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សឹត .អេ.លី
- ❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- ❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

- ❖ Original Illuatration and Naration in Thai by Gunapayuta.
- ❖ Translation into English by A Lu.
- ❖ Coloring by Yann Fang Lee
- ❖ Translation into Khmer by Bhikkhu Kong Am.

**១១៨-** មារទាំងឡាយបានធ្វើឱ្យព្រះទ័យព្រះអង្គរាយមាយធ្វើឱ្យស្រឡាញ់ពេញចិត្តជាប់ជំពាក់ទៅរកអារម្មណ៍សប្បាយរីករាយផ្សេងៗក្នុងអតីត និងមកដាស់ពញ្ញាក់ព្រះអង្គឱ្យមានតម្រេកនឹកចង់ត្រឡប់ទៅព្រះបរមរាជវាំង ទៅសប្បាយភ្លើតភ្លើនជាមួយនឹងជីវិតដែលពោរពេញទៅដោយកាមរាគៈដូចកាលពីគ្រាដើមវិញ។ តែដោយសារការតាំងសច្ចាធិដ្ឋានយ៉ាងប្ដូរផ្ដាច់ ព្រោះសិទ្ធត្ថទ្រង់តស៊ូទប់ទល់នឹងតណ្ហាទាំងនេះបានដោយព្រះទ័យព្យាយាមដ៏ខ្លាំងក្លា "**វីរិយបារមី**"។ ទីបញ្ចប់ទ្រង់ខំតស៊ូទប់ទល់នឹងតណ្ហាទាំងនេះបានកំចាត់បង់នូវសេចក្ដីយល់ខុសទាំងឡាយដែលតែមករំខានព្រះអង្គ។ ព្រះទ័យរបស់ព្រះអង្គបានសន្តិភាព ស្ងប់ស្ងាត់ល្អណាស់ប្រៀបពីដូចជាទឹកក្នុងបឹងនៅពេលដែលគ្មានខ្យល់បោកបក់ត្រូវដូច្នោះដែរ។ ព្រះអង្គទ្រង់តង់ស៊ប់ក្នុងសមាធិយ៉ាងជ្រៅ។

**១១៩-** ក្នុងភាពស្ងប់ស្ងប់ចុះក្នុងសមាធិកម្មដ្ឋាន ព្រះសិទ្ធត្ថទ្រង់បានរំពឹងគិតនឹងពិនិត្យមើលតាមព្រះបញ្ញាញាណ ទ្រង់ខំព្យាយាមរកព្រភពឫសគល់នៃខ្សែជីវិតរបស់ព្រះអង្គផ្ទាល់។ ព្រោះហេតុដូច្នោះ ព្រះអង្គទ្រង់បានសម្រេចនូវការរំលឹកឃើញនូវអតីតជីវិតជាអនេកជាតិរបស់ព្រះអង្គ (**បុព្វេនិវាសានុស្សតិ**)។ តាមរយៈការចំរើនវិបស្សនាកម្មដ្ឋានកាន់តែជ្រៅទៅៗ ព្រះអង្គទ្រង់បានសំរេចនូវព្រះចក្ខុវិញ្ញាណដ៏អស្ចារ្យ (**ទិព្វចក្ខុ** បារមីញាណដែលអាចមើលឃើញនូវអ្វីៗទាំងពួងនឹងដឹងនូវគ្រប់ជាតិកំណើតក្នុងជាតិខាងមុខរបស់មនុស្សសត្វទាំងអស់។ ព្រះអង្គត្រង់រំលឹកឃើញថា កង់ចក្រនៃការវិលកើតវិលស្លាប់. ស្លាប់កើតមិនមានទីបញ្ចប់របស់មនុស្សសត្វទាំងឡាយ គឺជាការកើតឡើងដោយសារតែកម្មតែម្យ៉ាងតែប៉ុណ្ណោះ គឺអំពើដែលខ្លួនបានធ្វើដោយកាយ វាចា ចិត្ត។ អ្នកខ្លះគេកើតមកមានជីវិតរស់នៅល្អប្រសើរឧត្តុងឧត្តមគេបានខុសកាយសប្បាយចិត្តក្នុងបច្ចុប្បន្នជាតិនេះបានជួបប្រទះនូវសុភមង្គលវិបុលសុខគ្រប់បែបយ៉ាង ព្រោះជនទាំងឡាយនោះ គេបានធ្វើកម្មជាកុសលពីជាតិមុនៗមក។ ចំណែកអ្នកកើតមកមានលក្ខណៈទីទ័លក្រីក្រតោកយ៉ាករូបអាក្រក់ខ្មោះខ្មុរ និងរងទុកលំបាកវេទនាអតិបរិមា ព្រោះគេបានព្រឹត្តអំពើអាក្រក់កាលពីជាតិមុនៗមក។

**១២០-** ព្រះអង្គទ្រង់ប្រមើលមើលឃើញថា ហេតុទីបំផុតនៃការអន្ទោលវិលកើតស្លាប់ៗក្នុងសមុទ្រសង្សារនៃទុក្ខគ្មានទីបញ្ចប់ ដែលមនុស្សសត្វទាំងឡាយតែងតែធ្លាក់លិចលង់ គឺសេចក្ដីល្ងីតល្ងង់វង្វេងភាន់ច្រឡំ (**មោហៈ**) និងការជាប់ជំពាក់ទៅនឹងកាមរោគៈសប្បាយភ្លើតភ្លើន។ ចំពោះមនុស្សសត្វទាំងឡាយណាដែលមានការនឿយណាយក្នុងសង្សារចក្រនៃការកើតស្លាប់ៗនេះ មានមាគ៌ាតែមួយគត់ដើម្បីគេចវេសជៀសវាងឱ្យផុត គឺការកំចាត់បង់ ឬគាស់រំលើងចោលឱ្យអស់នូវកាមតណ្ហាទាំងឡាយ។ ព្រោះហេតុដូច្នោះ ព្រះសិទ្ធត្ថបរមពោធិញាណទ្រង់ក៏បានសំរេចនូវ **អាសវក្ខយញ្ញាណ** ជាទីអស់នៃកងកិលេសទាំងពួងដែលជាគ្រឿងត្រាំនៅក្នុងខន្ធសន្តាន។ ព្រះអង្គទ្រង់ជ្រាបច្បាស់ថា ព្រះអង្គបានរួចផុតពីកិលេសតណ្ហា និងកងអវិជ្ជាល្ងិតល្ងង់វង្វេងភាន់ច្រឡំទាំងឡាយហើយ ព្រះអង្គទ្រង់បានរកឃើញហេតុដែលនាំឱ្យកើតទុក និងវិធីសាស្ត្រនៃការគាស់រំលើងសេចក្ដីទុក និងទ្រង់បានជ្រាប់ដោយព្រះអង្គឯងយ៉ាងច្បាស់ថា ព្រះអង្គបានត្រាស់ដឹងមនូវសម្មាសម្ពោធិញាណពេញបរិបូរហើយ នេះជាព្រឹត្តិការណ៍មួយដ៏អស្ចារ្យដែលកើតមានឡើង **មុនពេលថ្ងៃរះនៃថ្ងៃទី១៥កើតពេញបូណ៌មីខែពិសាខ** ។ ព្រះសិទ្ធត្ថគោតមនៃសក្យត្រកូលទ្រង់បានសំរេចការត្រាស់ដឹងដ៏ប្រពៃបានត្រាស់ជា **ព្រះពុទ្ធ** ក្រោមដើមពោធិ៍ព្រឹក្ស ក្បែរឆ្នេរស្ទឹងនេរញ្ជរា ក្នុងព្រះជន្ម៣៥វស្សា។ ព្រោះហេតុដូច្នោះ ហើយពិភពលោកក៏បានទទួលនូវពន្លឺប្រទីបដ៏ភ្លឺ ចិញ្ចែងចិញ្ចាចតាំងពីពេលនោះមក។

(នៅមានតលេខក្រោយ)



**118-** These phantoms distracted Siddhartha´s mind, enticing him to linger on the pleasures of the past and even arousing his desire to return to the royal palace and to enjoy the sensual life of former days. But because of his resolute vow, Siddhatha resisted these temptations with forceful these mental effort. Finally, he succeeded in completely dispersing all the illusory thoughts that were disturbing him. His mind became calm and tranquil like pond water on a breezeless day. He was in deep Samadhi.



119- In the tranquility of Samadha, Siddhatha Searched and observed mentally, trying to find the source of his own life. Thus he acquired the power of being aware of all his previous lives (Purvenivasanusmrti). Through further insight, he also acquired the divine vision (Divyacaksus), the power to see all things and to know the future rebirths of all beings. He thus came to realize that the unceasing cicycle of death and rebirth of all being is solely a manifestation of one's Karma; that is, one's thoughts and deeds. People could be born to a better life that they presently enjoyed, encountering all sorts of happiness, because they had done good deeds. Some, on the other hand, could be born to a condition worse that their present one and suffer very much because they had done bad deeds.



120- Finally he observed that the ultimate cause of the turning round of birth and death in the vast sea of worldly suffering, that mankind and all other sentient being are involved in, is ignorance (Moha) and the attachment to transient and illusory pleasures. And for those who are unwilling to remain in the cycle of death and rebirth, there is only one way to escape; that is, by the complete destruction or elimination of all lustful desires. Siddhartha thus acquired Asravaksaya, the extinction of outflows. He knew that he: had delivered himself from all discovered the cause of and the method of elimination of all suffering, and that he had attained enlightenment. This was a great event that occurred before dawn on the full moon day of the Visahka month. Siddhartha Gautama of the Sakya Clan, at the age of thirty-five, attained supreme enlightenment and became the Buddha under the Bodhi tree by the bank of the Nairanjana River. Since then the world has possessed a shining lamp.

*(Continued After Isssue)*

*(Continued from page 01 )*

# Cambodian New Year

The first day of the New Year is called **Maha Songkran.** This means the ending of the year and the beginning of the new one. People have their home cleaned, shrines are served with different fruits, drinks, sweets, foods, flowers, light candles and burn incense sticks to welcome the new deity. Family members also come together all dress up to pay homage at the Buddhist Temple to offer thanks for the Buddha's teachings; prostrating themselves three times before the Buddha image in a bowing and kneeling positions.

People like to wash their face with holy water in the morning, their chests at noon, and their feet in the evening before they go to sleep for good luck.

The second day of the New Year is referred to as **Virak Wanabat.** On this day people would contribute charity to the less fortunate by helping the poor, homeless, and low-income families. People dedicate this day to offer ceremony to their ancestors at the Buddhist Temple.

The third day is called Tngay Leang Saka. Today is a Buddhists cleansing day. Buddha statues and the elders are being cleansed with perfumed water. This ceremony is thought to be a "kind deed" that will bring longevity, good luck, happiness and prosperity in life.

Each Buddhist Temple organized its own New Year schedule and events in the United States. In Revere, Wat Ratanarangsi and community volunteer staffs organized the community event took placed on Saturday, April 16th from 1:00pm to 3:00 pm. Thornton Street, the Temple Street was block with security presented. The event held on stage, built from woods that sit on the Temple property, at one side of the Temple between the front Temple gate and wall. Major activities included: the parade of the Chhay Yam, the seven colors outfit that representing the seven days wardrobe, and band entertainment and dance. The participants were from Revere, the Metro-Boston, Lowell, Worcester, Lynn, and Philadelphia. Honor guests included the Revere Mayor and Chief of Revere

**Police Department.**

Wat Sanghikaram in Lynn hosted a community event on Sunday, April 17th from Noon until 5:00pm. The community organizers provided free foods, made available to all attendees out in the open space between the Sala Chan and the Kot. The band was sheltered under the tent by the Kot, leaving plenty of dancing space for all the temple goers and community members who were looking for Free New Year fun. Despite the rain comes and go, teasing with some little sun here and there the crow seem to enjoy themselves dancing throughout the afternoon.

*(Continued to page20)*





តមកទំព័រទី ០១

## ឆ្នាក់ឆ្នាំថ្មីឱ្យត្រូវតាមការស្រមៃ..

រូបកាយ ទីកន្លែងរស់នៅ សមជាមនុស្សមានមាយាទ សណ្ដាប់ធ្នាប់គួរសេពគប់ ហើយជាពិសេស មានការត្រៀមទទួលចែករំលែកភាពរីករាយ សប្បុរសប្បាយជាមួយនឹងមនុស្សដែលនឹងមកដល់...។ល។ ធ្វើរបៀបនេះបាន ទើបហៅថា ការបន់ស្រន់ គឺជាឥរិយាបថសំខាន់ មានការទទួលខុសត្រូវ គឺយើងជាជាងចម្លាក់នូវអនាគតរបស់ខ្លួនបាន ដោយប្រើកម្លាំងនៃការស្រមៃដ៏មានជំនឿរឹងមាំមួយ។

ពេលស្រង់ព្រះ ពេលពូនភ្នំខ្សាច់...។ល។ ពាក្យឧទ្ទិស និងបំណងប្រាថ្នានៅដដែលៗ ដោយមិនបានដឹងទៅដល់ថា "ចុះបើពាក្យឧទ្ទិសទាំងនោះ បែរជាបានសម្រេចនាឆ្នាំនេះទៅវិញ តើជីវិតអាត្មាអញនឹងត្រូវផ្លាស់ប្តូរប៉ុណ្ណា? តើអាត្មាអញបានត្រៀមខ្លួនហើយឬនៅ? ការខកខានពុំបានត្រៀមផ្លាស់ប្តូរ ក៏អាចជាបុព្វហេតុនៃការខ្សៀងលាភ ឬក៏រលាយលាភនោះទៅវិញដែរ។



ថ្ងៃបុណ្យចូលឆ្នាំនេះ គេបានកត់សំគាល់ថាមានអ្នកបន់ស្រន់សាកល្បង ឆ្លាក់អនាគតនៅគ្រប់ដំណាក់ការណ៍នៃពិធីដ៏គគ្រឹកគគ្រេងនេះជាច្រើនដង និងច្រើនដងព្រះសង្ឃ និងអាចារ្យបានប្រឹងប្រែងសំដែងពិធីឱ្យមនុស្សមកបន់ស្រន់ នៅពេលសូត្រមន្ត

ជារួមឆ្នាំថ្មីជាឱកាសពង្រឹងបំណងប្រាថ្នាឱ្យរឹតតែរឹងមាំ តែការត្រៀមខ្លួនពុំមែនជាឱកាសទេ តែជាទង្វើប្រចាំជីវិតដែលគ្រួសារនីមួយៗ ត្រូវតែមានក្បួន មានការណែនាំត្រឹមត្រូវ លោកអ្នកនឹងអាចឆ្លាក់វាសនាឱ្យឡើងខ្ពស់ទៅបាន ៕

# ជោគជតារាសីទាំង១២ប្រចាំឆ្នាំថោះ

**ឆ្នាំជូត**

ការងាររត់ការភាគច្រើនទទួលបានជោគជ័យ ក្នុងសង្គមការងារអាចមានការដោះដូរចៅហ្វាយនាយ ។ អ្នកធំ ឬមិត្តភ័ក្តិហាក់សម្តែងការសោះអង្គើយដាក់ ។ ខែនេះមានតម្រុយត្រូវចាយវាយលុយកាក់អស់ច្រើន តែមិនដល់ខ្វះរត់ពឹងអ្នកដទៃនោះទេ ។ ខែនេះមិនគួរប្រថុយប្រថានដាក់ទុនរកស៊ីនោះទេ ៕

**ឆ្នាំឆ្លូវ**

លោកអ្នកមានអារម្មណ៍ស្ពឹកស្រពន់មិនចង់ធ្វើអ្វីទាល់តែសោះ។ ការងារជួបឧបសគ្គធ្វើឲ្យ ង៉ាយមានអារម្មណ៍ធេវធាវ ។ ចាប់ពីដើមខែ លោកអ្នកគ្មានអារម្មណ៍បានសុខនោះទេ ។ តែក្រោយថ្ងៃទី១៣ អារម្មណ៍នឹងបានធូរស្រាលមុខជំនួញការងារមានផលល្អប្រសើរឡើង ។ ក្រោយថ្ងៃទី២១ ផលចំណូលអាចស្រកស្រុតចុះ ៕

**ឆ្នាំខាល**

មានអ្នកធំលូកដៃជួយជ្រោមជ្រែងទទួលបានជោគជ័យគួរឲ្យពេញចិត្ត ។ ក្រៅពីដំណើរការងារចាស់មានភាពរលូនហើយនោះ ក៏នៅមានការងារថ្មីៗហូរចូលមកទៀតផង ។ ក្រោយថ្ងៃទី១៦ទៅ លោកអ្នកមានទំនុកចិត្តកាន់តែល្អឡើង និងក្រោយថ្ងៃទី២១ ទៅមានការងារថ្មីៗហូរចូលបន្ថែមទៀត ៕

**ឆ្នាំថោះ**

មានចិត្តរារែកក្នុងការសម្រេចចិត្តធ្វើអ្វីមួយ ព្រោះភាគច្រើនៗប្រឈមមុខជាមួយគូសត្រូវ ដែលស្ថានភាពបែបនេះទាមទារឲ្យមានជំនឿចិត្តលើខ្លួនឯងទើបល្អ ។ រឿងលុយកាក់ពិតជាជួបការខ្វះខាត តែការងារព្រមព្រៀងគ្នាបែរជាងាយស្រួលបំផុត ។ នៅពាក់កណ្តាលខែនេះ នឹងបានទទួលរបស់ណាមួយដែលខ្លួនប៉ុនប៉ងទុកជាយូរមកហើយទៀតផង ៕

**ឆ្នាំរោង**

ស្ថានភាពលុយកាក់មិនមានដំណើរការល្អ ចិត្តគំនិតល្អក់កករមានជម្លោះនៅក្នុងសង្គមគ្រួសារងាយបំផុត ។ ក្នុងខែនេះមានលាភបន្តិចបន្តួចតែត្រូវចាយលុយច្រើន ។ គោងប្រយ័ត្នទៅលើគំនិតភ័ន្តច្រឡំលើនរណាម្នាក់ដោយមិនសមហេតុផល ។ មិនគួរធ្វើដំណើរទៅក្បែរសំណង់មិនទាន់រួច ។ រឿងស្នេហាមានការគាំទ្រពីចាស់ទុំ ៕

**ឆ្នាំម្សាញ់**

លោកអ្នកជួបរឿងប្រែប្រួលទៅរកផ្លូវល្អច្រើន ការដាក់ទុនរកស៊ីបានរីកចម្រើន អាចដោះស្រាយបញ្ហាធំៗបានសម្រេច ។ បណ្តាអ្នកធំជួយជ្រោមជ្រែងផ្តល់គំនិតល្អៗ ដែលសុទ្ធសឹងជាផលប្រយោជន៍ ។ តែមនុស្សដែលធ្លាប់ស្និទ្ធស្នាលពីមុនមកចាប់ផ្តើមឃ្លាតឆ្ងាយពីលោកអ្នកដោយមិនដឹងពីមូលហេតុ ។ រឿងស្នេហាមិនសូវល្អ ៕

**ឆ្នាំមមី**

គ្រប់ការងារទាំងអស់មានផលរីកចម្រើនខ្លាំងបំផុត តែមួយរយៈនេះមិនសូវមានការអត់ធ្មត់ ។ ក្រោយពីថ្ងៃទី១៣ទៅរឿងលុយកាក់កាន់តែរីកចម្រើនជាងមុន ។ ការទំនាក់ទំនងកាន់តែប្រសើរការលក់ដូរកើបផលកម្រៃបានច្រើនហួសពីការស្មានទុក ។ មិនតែប៉ុណ្ណោះរឿងស្នេហាក៏បានសម្រេចតាមបំណងទៀតផង ៕

**ឆ្នាំមមែ**

ភាពស្និទ្ធស្នាលរវាងបងប្អូនចាប់ឃ្លាតឆ្ងាយលជាបណ្តោះអាសន្ន បញ្ហាសុខភាពជារួមមិនសូវល្អ បើមានជំងឺចាប់ព្យាបាល ក៏ប៉ុន្តែបានល្អប្រសើររឿងកេរ្តិ៍ឈ្មោះកិត្តិយស ។ ការងារចរចាភាគច្រើនទទួលបានជោគជ័យនៅក្នុងភាគហ៊ុនមានភាពចុះសម្រុងគ្នាល្អ ។ ការងារជារួមទទួលបានផលល្អគ្រប់បែបយ៉ាង តែបើមានមនុស្សពឹងពាក់លុយកាក់គួរបដិសេធ៕

**ឆ្នាំវក**

ជោគជតារាសីកំពុងស្រុតចុះបន្តបន្ទាប់ធ្វើឲ្យរឿងលុយកាក់ជួបនឹងបញ្ហាស្មុគស្មាញ ។ ទោះបីជាបែបនេះក្តី ក៏នៅមានរឿងល្អខ្លះៗហូរចូលផងដែរ ។ ការងារទំនាក់ទំនងអាចទុកជាបណ្តោះអាសន្ន ។ ប្រសិនបើមានរឿងសំខាន់ណាមួយត្រូវសម្រេចនោះ គោងពិចារណាឲ្យម៉ត់ចត់បន្តិច ។ ចុងខែកាន់តែជួបផលលំបាកទ្វេដង ៕

**ឆ្នាំរកា**

ហាក់ដូចជាឃ្លាតឆ្ងាយពីសង្គមមិនសូវមានទំនាក់ទំនងជាមួយអ្នកដទៃ ធ្វើឲ្យការជឿជាក់លើខ្លួនឯងថយចុះ ។ ក្នុងសង្គមគ្រួសារកើតមានបញ្ហារការកូសបន្តិចបន្តួច ។ តែគោងចង់ចាំទុកថា រាល់ការងារទំនាក់ទំនងទាំងអស់ចៀសមិនផុតពីភាពបរាជ័យ ដោយសារទប់អារម្មណ៍មិនបាន ។ រឿងស្នេហាមានផលមិនសូវល្អ ៕

**ឆ្នាំច**

ការទំនាក់ទំនងមុខជំនួញបានល្អប្រសើរ ។ ចាប់ពីថ្ងៃទី៤ទៅអ្វីៗសព្វបែបយ៉ាងនឹងបានធូរស្រាលឡើងវិញច្រើន ដូច្នេះគួររូតរះសម្រេចការងារសំខាន់ៗឲ្យរួចមុនបំណាច់ខែនេះ ។ រាល់បញ្ហាទាំងអស់នឹងមានមនុស្សលូកដៃជួយដោយគ្មានសំណង ។ ចាប់ពីថ្ងៃទី២១ ទៅមានចំណូលពីការងារតែលាភផ្សងសំណាងគ្មាននោះទេ ៕

**ឆ្នាំកុរ**

ជីវិតប្រចាំថ្ងៃធ្លាក់ស្ពឹកស្រពន់គ្មានភាពស្វុះស្វា ទោះបីជាមានវត្ថុជំនួយបន្ទុកកម្លាំងក៏ដោយចុះ ។ ក្នុងខែនេះមានមនុស្សមកទំនាក់ទំនងច្រើនមានទាំងថ្មី និងចាស់មកចម្រុះគ្នា តែប្រសិនបើអ្នកនៅឃ្លាតឆ្ងាយពីអ្នកនោះ នឹងបានសេចក្តីសុខ ។ ក្នុងខែនេះលាភពីការងារមិនសូវមាន តែលាភផ្សងសំណាងអាចទទួលបានខ្លះៗ។ ចំណែករឿងស្នេហាមានទុក្ខ ៕

# សក់ស្កូវកាន់តែដកកាន់តែដុះមែនទេ?

●●●ក្នុងវ័យដែលចាប់ផ្តើមមានសក់ស្កូវយើងតែងគិតថា មិនហ៊ានដកស្កូវចេញ ព្រោះជឿថាពេលដែលដកសក់ស្កូវចេញរោគសក់ស្កូវនឹងរាតត្បាតកាន់តែច្រើនឡើង ឬកើតចេញឫសសក់ស្កូវដែលយើងបានដកចេញនោះកើតឡើងវិញ រហូតធ្វើឲ្យកើតសក់ស្កូវពេញក្បាល ។

ប៉ុន្តែការពិតឫសសក់មួយសរសៃនឹងសាងសក់១សរសៃ ហើយចំពោះការដក់ស្កូវមួយសរសៃ ចេញវាមិនអាចធ្វើឲ្យសរសៃសក់ដុះឡើងបន្ថែមបានវិញនោះទេ ដូច្នេះការដែលជឿថា កាន់តែដកស្កូវកាន់តែដុះនោះមិនមែនជាការពិតទេ តែសក់ស្កូវដែលដុះបន្ថែមឡើងទៀតនោះ គឺកើតចេញឡើងពីមូលហេតុផ្សេងៗទៀត ដែលអាចកើតមានទៅតាមសុខភាព និងវ័យរបស់យើង ។

ដើម្បីការពារចំពោះមូលហេតុមុនពេលស្កូវដុះមុនវ័យនោះ យើងគួរថែរក្សាសរសៃសក់ដែលដុះខ្មៅដោយការទទួលទានអាហារដែលមានប្រយោជន៍ ដូចជាល្ងខ្មៅ ជាដើមដើម្បីបំប៉នសរសៃសក់ ប៉ុន្តែបើស្កូវដុះច្រើន ហើយអ្នកមិនសប្បាយចិត្តយើងអាចលាបឬជ្រលក់ពណ៌ខ្មៅជំនួសបានមិនជាបញ្ហាអ្វីទេ ៕

សោភ័ណភាព

# របៀបសម្អាតប្រអប់ជើង និងក្រចក

●●●មនុស្សភាគច្រើនតែងតែមើលរំលងចំពោះការថែទាំជើង ព្រោះយល់ថា ជើងគឺជាអវយវៈមួយដែលមិនសូវមាននរណាចោលភ្នែកមើលប៉ុន្មានឡើយ ។ បើលោកអ្នកគិតយ៉ាងនេះ គឺមិនមែនជាការគិតត្រឹមត្រូវឡើយ ដូចនេះការដែលយើងមានជើង និងក្រចកជើងស្អាត ឬកែងជើងទន់ល្មើយនោះ ក៏វាប្រសើរជាងជើងដែលរឹងគគ្រាត និងកែងជើងស្ងួតប្រេះដែរ ។ម្យ៉ាងទៀតការថែទាំជើង វាមិនមែនជាការពិបាក ឬត្រូវចំណាយពេលអ្វីយូរណាស់ណាទេ ។

ដូច្នេះសុភាពស្ត្រីទាំងឡាយគួរតែចំណាយពេលយ៉ាងហោចណាស់មួយសប្តាហ៍ម្តង ដើម្បីលើកនូវសោភ័ណភាពជើង យើងមានដូចខាងក្រោមនេះ :

●ពេលដែលយើងលាងថ្នាំក្រចកចេញហើយអ្នកអាចចាប់ផ្តើមខាត់ជើងរបស់អ្នកបាន ។ ត្រូវយកចានដែកដាក់ទឹកក្តៅឧណ្ហៗ រួចចាក់អំបិលចូលបន្តិចបន្ទាប់មកដាក់ជើងចូលក្នុងចានដែកត្រាំមួយស្របក់ ។ យកច្រាសសម្រាប់ខាត់ជើងមកខាត់ថ្នមៗឲ្យសព្វ ឬបើចង់ឲ្យវាប្រសើរជាងនេះទៀតនោះអាចយកស្ករ.សពណ៌កន្ទក់មួយស្លាបព្រាបាយ, ទឹកឃ្មុំបន្តិច និងទឹកក្រូចឆ្មារមួយស្លាបព្រាកាហ្វេមកកូរបញ្ចូលគ្នាឲ្យសព្វ រួចហើយយកមកខាត់ជើង ។ ធាតុផ្សំទាំងអស់នេះក្រៅពីធ្វើឲ្យជើងស្អាតអស់ជាតិកខ្វក់ហើយនោះ វាថែមទាំងធ្វើឲ្យកែងជើងរបស់អ្នកទន់ល្មើយ គួរឲ្យចង់ស្ទាបអង្អែលទៀតផង ។

**វិធីសំអាតមួយបែបទៀត**

●ត្រូវត្រៀមទឹកក្តៅឧណ្ហៗលាយជាមួយនឹងប្រេងអូលីវ រួចហើយដាក់ជើងត្រាំឲ្យបានប្រហែលជា៥នាទី។

●ពេលត្រាំ និងខាត់ជើងរួចហើយ ត្រូវយកកន្ត្រៃកាត់ក្រចកមកកាត់ និងយកដែកអង្រួសក្រចកមករូសក្រចកឲ្យវាកាន់តែស្អាតថែមទៀត ។

●ត្រូវយកឡេសម្រាប់លាបជំនួយក្រចកមកលាបស្រឡាបតាមក្រចកជើង រួចយកឡេលាបខ្លួនមកលាបស្រឡាបជើងឲ្យសព្វ ។

●បើអ្នកចង់លាបថ្នាំក្រចកទៀត អ្នកត្រូវលើកពេលមួយយប់សិន ដើម្បីឲ្យក្រចកបានដកដង្ហើមខ្លះស្អែកឡើងសឹមលាបទើបជាការប្រសើរ ។

●ក្រៅពីការសម្អាត និងរក្សាទៅតាមដំណាក់កាលដូចដែលបានរៀបរាប់មកខាងលើនេះហើយប្រសិនបើចង់ស្តារសភាពជើង និងកែងជើងពីរឹងគគ្រាតមកជាទន់ល្មើយនោះ អ្នកត្រូវលាងជើងឲ្យស្អាតមុននឹងចូលដំណេករៀងរាល់យប់ រួចយកឡេលាបខ្លួនមកលាបស្រឡាបឲ្យសព្វលើជើង ជាពិសេសលាបត្រង់កែងជើងឲ្យបានច្រើនផង ។ ប៉ុណ្ណឹងមិនទាន់គ្រប់គ្រាន់នៅឡើយទេ គឺអ្នកត្រូវពាក់ស្រោមជើងដេកផង ធ្វើយ៉ាងនេះឲ្យបានញឹកញាប់ស្បែកប្រអប់ជើងរបស់អ្នកនឹងស្រស់ភ្លឺថ្លាមិនខាងឡើយ ៕

សូមអញ្ជើញចូលរួម

# ពិធីបុណ្យចូលឆ្នាំខ្មែរ

ថ្ងៃសៅរ៍ ខែមេសាថ្ងៃទី ៣០ ឆ្នាំ ២០១១

ពត៌មានបន្ថែមឬស្ម័គ្រចិត្តជួយ:
email: KCPCLynn@gmail.com
call: 781-780-7457
or find us on Facebook!

ម៉ោង ១១ ព្រឹកដល់ម៉ោង ៥ ល្ងាច
ខែមេសាថ្ងៃទី ៣០ ឆ្នាំ ២០១១
ទីកន្លែងនៅ Lynn Common



ឧបត្ថម្ភដោយ:




Join the Khmer Cultural Planning Committee and the Greater Lynn Community for the 10th annual

# KHMER NEW YEAR

## Celebration and Community Fair

DANCE - MUSIC - FOOD - GAMES - HEALTH SCREENS - RESOURCES - CULTURE

For INFO or to VOLUNTEER
email: KCPCLynn@gmail.com
call: 781-780-7457
or find us on Facebook!

**SATURDAY**
**APRIL 30 2011**
**LYNN COMMON**
**11am - 5pm**
**PARADE starts 9am**



BROUGHT TO YOU BY:






Massachusetts Council on
# Compulsive Gambling

*We understand the problem. We can help.*

## ក្រុមប្រឹក្សារដ្ឋម៉ាសាឈូសេតសំរាប់ ការញៀនល្បែងស៊ីសង

"ប្រសិនបើលោកអ្នក ឬនរណាម្នាក់ដែលអ្នកស្គាល់
មានបញ្ហាញៀនល្បែងស៊ីសង សូមទូរស័ព្ទមកលេខ
ខាងក្រោម អាចជួយជាអ្នកសម្ងាត់ ហើយ
សួររកសៀវភៅសម្រាប់ឱ្យអាចជួយខ្លួនឯងបាន
ជាភាសាខ្មែរដោយឥតគិតថ្លៃ"

**1-857-383-3577**

ជំហានដំបូងរបស់អ្នកឆ្ពោះទៅកាន់ការផ្លាស់ប្តូរ

www.asianproblemgambling.org



(Continued from page 15 )

# Cambodian New Year...

## វត្តនៅ ឡូវែល និង លីន


ពិធីចំរើនព្រះជន្មថ្ងៃបកំណើតរបស់ព្រះអង្គ សៅ ឃន


វត្តលើ


ស្រង់ព្រះ


វត្តក្រោម

## វត្តនៅ រីវែរ







ល្បែងបាចម្សៅនៅរីវែរ

